សារព័ត៌មាន ខ្មែរផុស ស.រ.អា

# KhmerPost USA

E-mail: info@khmerpost.us / Website : khmerpost.us
Advertising: 978-656-8141/ Hotline news: 1 (267) 253-3947

Issue 152 April 25th -May 08th, 2014

Free

មាតិការរឿង



New Office: Tel: (978) 677-7163 Fax: (978) 677-7092
45 Merrimack St. Suite 218A Lowell, MA 01852

## វាចាថ្ងៃនេះដោយ : ពិន សំខុន

## សញ្ញានៃថ្ងៃអន្សារបស់ ហ៊ុន សែន



ការ"ចចា"រកូបមន្តឱ្យគណបក្សសង្គ្រោះជាតិយល់ព្រមចូលសភាជាតិបានអូសបន្លាយកាន់តែវែង ស្ទើររកទីបញ្ចប់មិនឃើញ ។ គេនៅចងចាំនៅឡើយ នូវការបញ្ចេញថ្វីដៃ"ចរចា"ដ៏អស្ចារ្យរបស់ ហ៊ុន សែន កាលពីសន្និសីទក្រុងប៉ារីស នារំឡុងឆ្នាំ១៩៩០ ធ្វើឱ្យគេយល់ថា លើកនេះទៀត គូរបដិបក្សនឹង ហ៊ុន សែន នឹងចាញ់កល្បបុរសខ្លាំងនេះ ដូចពេលមុនជាមិនខាន។ "ចយឌឹក អឺយ" បាត់ទឹកដីអស់ហើយនៅបាតុកម្មអហឹង្សាអីទៀត? នេះជាភាពអស់សង្ឃឹមដែល ហ៊ុន សែន



តទៅទំព័រទី ២១

# បុណ្យចូលឆ្នាំខ្មែរនៅឡូវែល ឆ្នាំ ២០១៤




ដោយ : ខ្មែរផុសស.រ.អាក្រុងឡូវែល : តាមប្រពៃណីប្រជាជនខ្មែរតែងប្រារព្ធពិធីបុណ្យចូលឆ្នាំខ្មែរនៅខែមេសា។ តទៅទំព័រទី ១០

## កឹម សុខា_ហួរ៉ាន់ នៅឡូវែល

ដោយ: ខ្មែរផុសស.រ.អា.

លោក កឹម សុខា អនុប្រធានគណបក្សសង្គ្រោះជាតិអមដំណើរដោយលោក ហ៊ូ វ៉ាន់ ទាំងពីររូបជាបេក្ខជនជាប់ឆ្នោតសភាជាតិកម្ពុជា កាលពីខែកក្កដាឆ្នាំ២០១៣ តែធ្វើពហិការមិនចូលកាន់ដំណែងដោយសារការបោះឆ្នោតមិនត្រឹមត្រូវបានធ្វើដំណើរមកដល់ទីក្រុងឡូវែល កាលពីរសៀលថ្ងៃសុក្រទី១៨ ឧសភា២០១៤ ដើម្បីជួបជុំសហគមន៍ខ្មែរដែលអញ្ជើញមកពីឆ្ងាយជិតក្នុងតំបន់រង់ចាំធ្វើបដិសណ្ឋារកិច្ចយ៉ាងកក់ក្តៅប្រមាណ៤០០នាក់នៅភោជនីយដ្ឋាន"សំពៅមាស"។



លោក កឹម សុខា បានថ្លែងថា "ក្នុងដំណើរ ២០ថ្ងៃនៅស.រ.អា លោកបានជួបពលរដ្ឋខ្មែរ១៥រដ្ឋគណបក្សសង្គ្រោះជាតិបានទទួលការលើកទឹកចិត្តយ៉ាងកក់ក្តៅពីប្រជាពលរដ្ឋខ្មែរដែលរស់នៅសហរដ្ឋអាមេរិក ហើយនឹងថ្នាក់ដឹកនាំអាមេរិកាំងផងដែរ"។ លោកជាអ្នកផ្តល់សេចក្តីរាយការណ៍យ៉ាងវែងអំពីស្ថានការណ៍នយោបាយតឹងតែងដែលរដ្ឋបាលលោក ហ៊ុន សែន ខំប្រឹងពន្យាពេលចចារគ្នា ដើម្បីកាន់កាប់អំណាចរដ្ឋទាំងខុសច្បាប់ តែគណបក្សសង្គ្រោះជាតិនៅតែទទូចឱ្យមានការកែទម្រង់"គណកម្មការជាតិរៀបចំការបោះឆ្នោត" នឹងរៀបចំការបោះឆ្នោតសារជាថ្មីឡើងវិញឱ្យបានឆាប់។ គណបក្សសង្គ្រោះជាតិធ្វើពហិការនៅក្រៅអំណាចតែបានធ្វើឱ្យរដ្ឋបាលលោក ហ៊ុន សែន ក្លាយជាអ្នកគ្រប់គ្រងប្រទេសដោយសមាជិកសភាជាតិតែពាក់កណ្តាល តទៅទំព័រទី១៧

## បេក្ខជនតំណាងរដ្ឋធ្វើទស្សនកិច្ចក្នុងកិច្ចប្រជុំបក្សប្រជាធិបតេយ្យក្នុងតំបន់ឡូវែល

## Candidates visit GLAD meeting

ប្រែសម្រួលសង្ខេបដោយ : សុខា
និពន្ធដោយ ឌីក ឬ រីឆាដ ហាវ
April 20, 2014 DickH

បក្សប្រជាធិបតេយ្យនៃតំបន់ឡូវែលបានរៀបចំកិច្ចប្រជុំប្រចាំខែមួយនៅសណ្ឋាគារ រ៉ាឌីសិន នៃតំបន់ឆឹមស្វឺដ កាលពីព្រឹកនៃថ្ងៃទី ១៩ខែមេសា ឆ្នាំ២០១៤ និងបានស្វែងយល់ពីបេក្ខជនមួយចំនួនដែលនឹងមានឈ្មោះនៅលើសន្លឹកឆ្នោតសម្រាប់ការបោះឆ្នោតបឋមនៅថ្ងៃទី៩កញ្ញា នាពេលខាងមុខនេះ។ ខាងក្រោមជាការរាយនាមឈ្មោះ និងវាចារបស់ពួកគាត់ :

The Greater Lowell Area Democrats held their monthly meeting at the Chelmsford Radisson yesterday morning and heard from a number of candidates who will be on the ballot for the September 9, 2014 Democratic primary. Here's who was there and what they had to say :

**Martha Coakley,** candidate for Governor and current Attorney General, said "we have to be prosperous and fair," a message she repeated several times during her remarks. She acknowledged that the state is still struggling to get back to where it was before the recession, but she our best opportunity to provide តទៅទំព័រទី ១០



Martha Coakley ម៉ាថា ខូកលី
បេក្ខនារីឈរឈ្មោះសម្រាប់តួនាទីអភិបាលរដ្ឋ

# KhmerPost USA

## 4th Annual Media & Community Gala Celebrate the

## Asian/Pacific American Heritage Month

## ប្រិយមិត្តខ្មែរផុសស.រ.អា ជាទីរាប់អាន



ក្នុងឱកាសពិធីបុណ្យទទួល"ខែឧសភានៃកេរ្តិ៍ដំណែលវប្បធម៌អាស៊ីប៉ាស៊ីហ្វិក"នេះ សារព័ត៌មានខ្មែរផុសស.រ.អា មានសេចក្តីរីករាយនឹងរៀបចំរាត្រីសមោសរប្រចាំឆ្នាំមួយនៅថ្ងៃទី២ ខែឧសភា ឆ្នាំ២០១៤ វេលាម៉ោង៦ល្ងាចនៅភោជនីយដ្ឋាន"ហុងកុង"ស្ថិតនៅ៣១៨ផ្លូវ Westford Lowell, MA 01852 ដោយមានសហគមន៍អាស៊ីដែលរស់នៅជុំវិញយើង មន្ត្រីផ្លូវការនិងឯកជនចូលរួម ជាពិសេសមានអញ្ជើញលោកឯកអគ្គរដ្ឋទូតអាមេរិកាំងប្រចាំអង្គការសហប្រជាជាតិដើមកំណើតខ្មែរ ស៊ីចាន់ ស៊ីវ ចូលរួមជាវាគ្មិនកិត្តិយសផង ។

រាត្រីសមោសរប្រចាំឆ្នាំទី៤នេះ ខ្មែរផុសស.រ.អា.មានបំណងឧទ្ទិសចំពោះការចូលរួមរបស់សហគមន៍អាស៊ីជាមួយប្រជាជាតិអាមេរិកាំងក្នុងឱកាសបុណ្យជាតិដ៏ធំមួយ ដែលនៅរៀងរាល់ខែឧសភាសហរដ្ឋអាមេរិក តែងតែប្រារព្ធការទទួលស្គាល់កេរ្តិ៍មរតកវប្បធម៌អាស៊ីស្មើមុខ និងវប្បធម៌អាមេរិកាំងដែរ ។ លោកឯកអគ្គរដ្ឋទូត ស៊ីចាន់ ស៊ីវ កើតនៅកម្ពុជា ធ្លាប់ជាឧបការីលោកប្រធានាធិបតី ជច ឧបិលយូ ប៊ូស្ហ ពីឆ្នាំ១៩៨៩-៩៣ ធ្លាប់បានទទួលការតែងតាំងជាឯកច្ឆន្ទដោយព្រឹទ្ធសភាអាមេរិកាំង ជាឯកអគ្គរដ្ឋទូតប្រចាំអង្គការសហប្រជាជាតិឆ្នាំ២០០១-២០០៦ ក៏បានទទួលការអញ្ជើញមកជាវាគ្មិនកិត្តិយស និងមកបង្ហាញពីស្នាដៃនិពន្ធរបស់លោក"ឆ្លងមាស"នារាត្រីនោះដែរ ។ មិនត្រឹមតែប៉ុណ្ណោះពិធីយើងនឹងសំរាំងបំរើភោជនាហារ៥មុខ មានកំដរដោយក្រុមតន្ត្រីសម័យមានបាប់រីភេសជ្ជៈ មានការបង្ហាញសំលៀកបំពាក់ពហុវប្បធម៌ មានដាក់ឱ្យដេញថ្លៃសម្ភារត់នូវវត្ថុសិល្បៈជ្រើសរើស... ដែលនឹងធ្វើឱ្យរាត្រីសមោសរចូលរួមដោយភ្ញៀវពិសេស១៣៥០នាក់ មានមន្ត្រីរដ្ឋាភិបាលក្នុងតំបន់នឹងក្នុង រដ្ឋតំណាងពាណិជ្ជករ អ្នកផ្តល់សេវាកម្មផ្សេងៗ តំណាងអង្គការនានាកុះករនោះ នឹងក្លាយទៅជាត្រចះត្រចង់ជាពុំខាន ។

ខ្មែរផុសស.រ.អា.បានពង្រីកការផ្សាយពី"ហ្វីឡាដែលហ្វៀ"តាំងតែពី៣ឆ្នាំមកហើយ មកដល់រដ្ឋម៉ាសាឈូសែតមាន"ឡូវែល""លីន នីងរីវែ"ចូលដល់ផ្ទះប្រមាណ២ម៉ឺនគ្រួសារ ។ ហេតុនេះហើយ បានជាយើងអាចសន្និដ្ឋានបានថា ខ្មែរផុសស.រ.អា. គឺជាអ្នកនាំពាំបំពងសម្លេងទីមួយរបស់សហគមន៍ខ្មែរ នឹងភ្ជាប់ទៅហ្នឹងសហគមន៍នៅជុំវិញខ្លួន ទៅអ្នកជំនួញ អ្នកផ្តល់សេវាកម្ម នឹងរដ្ឋាភិបាលក្នុង និងក្រៅតំបន់ ។

**លិខិតនេះជាសេចក្តីអញ្ជើញចូលរួមក្នុងរាត្រីសមោសរ!** សូមលោកអ្នកប្រិយមិត្តខ្មែរផុសអញ្ជើញមកចូលរួមកុំខាន ដើម្បីជាការជួយលើកដំកើងវប្បធម៌ខ្មែរផង អាស៊ីផង នឹងជាកិត្តិយសដល់សហគមន៍ខ្មែរយើងនៅឡូវែលនេះផង ។

ពិន សំខុន និពន្ធនាយក

សុបិន ពិន នាយកគ្រប់គ្រង






# សារព័ត៌មានខ្មែរប៉ុសចូលរួមជាវាគ្មិនក្នុងការពិភាក្សាអំពីប្រព័ន្ធផ្សព្វផ្សាយក្នុងតំបន់

**អត្ថបទដោយ : ចេម អសទីស**

**ប្រែសម្រួលដោយ : សុខា**

តើតួនាទីរបស់ផ្សព្វផ្សាយក្នុងសហគមន៍មានអ្វីខ្លះ? នេះជាសំណួរចោទជាចម្បងក្នុងកិច្ចពិភាក្សាដែលបានប្រព្រឹត្តទៅកាលពីថ្ងៃទី១ មេសា ឆ្នាំ២០១៤ ខណៈដែលលោក រ៉ជឺ សំខុន ពិន និង សុបិន្ត ពិនពីខាងសាពត៌មានខ្មែរឆ្លើយឆ្លងការសន្ទនាជាមួយអ្នកនិពន្ធអត្ថបទមកពីសាពត៌មានឡូសាន់ ជីម ខាមផានីនី និងអ្នកគ្រប់គ្រងដំណើរការវិទ្យុដាប់បិលយូ ស៊ី អេ ភី សម ពូលថិន។ សូមអានព័ត៌មានពិស្តារជាភាសាអង់គ្លេសខាងក្រោម។

# KhmerPost USA participates in local media panel discussion

What is the role of the media in terms of reflecting the culture of a community? That question was a major topic of discussion on April 1st, as Roger and Soben Pin of the KhmerPost USA join Lowell Sun Editor Jim Campanini and WCAP Radio owner/operator Sam Poulten in participating in a panel talk about the local media scene before a class of UMass Lowell Community Psychology students in Professor Bill Berkowitz's class.

The hour-long discussion featured a mix of prearranged topics and student questions. Much of the day's talk was focused on the Cambodian population in Lowell and how each of the outlets represented reach out to the community. Roger Pin spoke about the KhmerPost USA's emphasis on covering local stories within the Cambodian community as a unique feature that sets the KhmerPost USA apart from other Khmer language newspapers that focused more on news from Cambodia. Campanini discussed the challenges that a mainstream newspaper has when it comes to covering specific ethnic communities while maintaining their broader appeal.

Technology was another major factor influencing the news business today. While paper subscriptions are decreasing, Campanini points to the large increase in online readers at the Lowell Sun and partner websites. Poulten likewise discussed the pros and cons of the increasing shift towards online streaming of radio programming rather than the traditional over the air method. The KhmerPost has recently expanded its digital presence both through an updated website format and increased social media presence.

The discussion remained engaging throughout with students asking challenging questions and panelists challenging the students as well, including a particular word puzzle that Poulten stumped the crowd with. The session ended on a note of promise with all three media outlets pledging to discuss ways to collaborate on the important question of reaching out to Lowell's ethnic communities.


នាយកសារព័ត៌មានខ្មែរប៉ុស និងនាយក ឡូសាន់


សុបិន្ត ពន្យល់ពីការគ្រប់គ្រងកាសែតខ្មែរប៉ុសសស់អង្គប្រជុំ


សាស្ត្រាចារ្យ និងនិស្សិតមហាវិទ្យាល័យយូម៉ាសជួបនឹងនាយកសារព័ត៌មាន


នាយកវិទ្យុ AM WCAP

# Lowell Elder Care Celebrates Cambodian New Year

# ឡូវែលអែលឌឺឃែរប្រារព្ធពិធីបុណ្យចូលឆ្នាំខ្មែរ

## Ladies celebrate Cambodian New Year with Fashion Show

ថ្ងៃទី១៤ ខែមេសាឆ្នាំ២០១៤ ជាថ្ងៃបុណ្យចូលឆ្នាំថ្មីនៃប្រជាជនខ្មែរដែលជាភាសាខ្មែរ គេហៅបុណ្យនេះថា ជាបុណ្យចូលឆ្នាំខ្មែរ។ បុណ្យចូលឆ្នាំខ្មែរជាពេលដែលឆ្នាំថ្មីចូលមកដល់។ មជ្ឈ-មណ្ឌលថែទាំមនុស្សចាស់ឡូវែល ឬឡូវែលអិលដឺឃែរបានប្រារព្ធកម្មវិធីប្រពៃណីនេះ រយៈពេល ១សប្តាហ៍ ហើយបានចាប់ផ្តើមតាំងពីថ្ងៃទី១៣ ខែមេសា នៅចំពេលដែលច្រូតកាត់ហើយ គឺក្នុងពេលដែលប្រជាជនទទួលភោគផលផ្លែឈើ និងបន្លែពីដំណាំកសិកម្មមុនរដូវវស្សាចូលមកដល់។ ទោះបីជាប្រជាជនខ្មែរអាមេរិកាំង មិនមែនជាកសិករតាមបែបបុរាណក៏ដោយ ក៏គ្រួសារ និងមិត្តភក្តិនៅតែជួបជុំគ្នា ដើម្បីប្រារព្ធប្រពៃណីទំនៀមទម្លាប់នៃបុណ្យចូលឆ្នាំនេះ ហើយជាទូទៅគឺ



បុណ្យនេះ បំពេញដោយម្ហូបអាហារខ្មែរ ជាច្រើន ដូចជា សាច់គោអាំង និងអមដោយការកំសាន្ត ដូចជារបាំជូនពរ និងការឱ្យពរព្រះសង្ឃ។

Lowell Mass April 14, 2014: Cambodian New Year: បុណ្យចូលឆ្នាំថ្មី) in the Khmer language, literally "Enter New Year", is the name of the Cambodian holiday that celebrates the New Year. Lowell Elder Care Adult Day Health Care Center celebrated the holiday with a week – long of holiday traditions and events beginning April 13th. Which in Cambodia is the end of the harvesting season, when farmers enjoy the fruits of their labor before the rainy season begins. Although many Cambodian Americans are not the traditional Cambodian farmers, family and friends still gather for an opportunity to celebrate the Cambodian culture, usually filled with Cambodian food such as the mouth-watering "sach-go ang" or beef skewers, the lovely sounds accompanying the traditional "robams" or dances, and the humming of the Buddhist monks' chants. The celebration at Lowell Elder Care was a reminder to those who have been uprooted from their homes in Cambodia of the rich culture and traditions that still exists. It is also the small thread that allows the newer Cambodian American generation to hold on to a piece of their identity. A good time was had by all.




**តពីលេខមុន និងចប់**

**ដកស្រង់ពីសៀវភៅផ្សេងៗ -សម្រាយដោយ ខ្មែរផុស ស.រ.អា.**

ថ្វីត្បិតតែ"ការសន្សំតក់ៗ"ជាគំនិតនឹងប្រាជ្ញារបស់មនុស្សម្នាក់ៗក៏ដោយក្ដីការអាចធ្វើទៅបានជា"អ្នកមានប្រាក់រាប់លាន"ទៅថ្ងៃក្រោយក៏នៅតែជាកង្វល់របស់គ្រួសារជាទូទៅដដែល ។ "គ្រួសារផ្ទាល់របស់ខ្លួន"គឺជាជីវិតបន្តពូជ គឺជាសេចក្ដីស្រឡាញ់ជាធម្មជាតិ គឺជាអំពើល្អក្នុងចិត្តសាកលសម្រាប់មនុស្សរួមរស់ជាមួយគ្នារួមកម្លាំងពិគ្រោះនឹងសម្រេចដើម្បីភាពចម្រើននៃគ្រួសារ... ។ល ។ បានក្លាយជាកត្តាសំខាន់បំផុតជាចុងក្រោយបង្អស់នៃអត្ថបទ"សន្សំតក់ៗ"នេះ យើងសួរថា "តើហេតុអ្វីបានជាគ្រួសារក្លាយជាកត្តាសំខាន់សម្រាប់ចរិកជាអ្នកមាន"?

នៅក្នុងការសិក្សាពីសង្គមលើ"អ្នកមាន"ចំនួន ១៥០០នាក់ ស្ដីពី"ចរិកអ្នកមាន" បណ្ឌិតថូម៉ាសស្ដន់ឡេយបានសង្កេតឃើញចម្លើយដែលយើងសូមសង្ខេបដូចតនេះ

**៦**-គ្រួសារគឺជាជន្ទល់នៃការខំប្រឹងរកឱ្យមានក្រុម"អ្នកមាន"ទាំងនោះ ជា"អ្នកមាន"តពូជ -ជាអ្នកទើបនឹង"មាន"-អ្នកមានចំណេះខ្ពស់ -អ្នកមិនបានរៀនជ្រៅជ្រះ -អ្នកមានវិជ្ជាជីវៈចម្រុះនឹងអ្នកចូលនិវត្តន៍...នៅពេលសួរថា"តើអ្នកបានជ្រើសរើសភរិយា ឬស្វាមីដោយសារកត្តាអ្វី?" ចម្លើយលើស៩៥ភាគរយថា "ដោយសារចរិកស្មោះត្រង់" បន្ទាប់មកមាន "ស្រឡាញ់ -ឆ្លាតវៃ -យល់ចិត្តគ្នា -សុចរិត -ឧស្សាហ៍..."។ ការជ្រើសរើសគូស្រករជាការប៉ុនប៉ងរស់ជួបជុំគ្នាឱ្យបានយូរអង្វែងក្នុងចំណោមគូស្រករជួបជុំគ្នា៣៥ឆ្នាំឡើងទៅដែលជាអ្នកមាន "មានខាន់ស្លា" លើស៧៥ភាគរយជាប្ដីប្រពន្ធមានតែ២០ភាគរយទេ ដែលបែកបាក់ ឬគ្មានប្រពន្ធស្របច្បាប់ ដូច្នេះការដែលមាន "ប្រពន្ធស្របច្បាប់"ប្រាកដជាកត្តាសំខាន់មួយដែលនឹងជួយឱ្យឆាប់"មាន"នោះហើយ ។ ចុះ "ហេតុអ្វីក៏លក្ខខណ្ឌប្រពន្ធ ឬប្ដីស្របច្បាប់ជួយឱ្យឆាប់មាន?"ចម្លើយនៃក្រុម"អ្នកមាន"នោះថា "ការលះបង់ដើម្បីប្ដី ឬប្រពន្ធរបស់ខ្លួន -ការជួយលើកទឹកចិត្តគ្នាប្រឈមមុខនឹងការលំបាក -ការចេះស្រឡាញ់មានបងប្អូនមិត្តភក្ដិច្រើន -មានគោលដៅចាំបាច់សម្រាប់ជីវិតដូចគ្នា..." ដែលយើងសូមលើកយកឧទាហរណ៍ខ្លះៗមកជូនដូចតទៅ :

បុរសម្នាក់ធ្វើការនៅរោងចក្រមួយការប្រពន្ធរួចហើយនៅពេលអង្គុយគិតពីគម្រោងវែងឆ្ងាយសម្រាប់អនាគតប្រពន្ធដែលប្រកបការងារជាមេផ្ទះ សួរថា "បើបងអស់ការងារធ្វើតើបងនឹងធ្វើអ្វីទៀត?" ប្ដីឆ្លើយថា "នឹងរកការងារ



ធ្វើមួយទៀត" ពេលនោះ បុរសជាប្ដី ផ្ដើមគិតគូរទៅដល់ពេលដែល "អត់ការធ្វើ"អាចនឹងមកដល់ ប្រពន្ធបន្តការងារទុកដាក់ក្នុងផ្ទះមានការចំណាយចាំបាច់រាល់ថ្ងៃសន្សំសំចៃដោយ"គូបពន"ទិញរបស់ប្រើប្រាស់"ថ្មី"តែរង់ចាំពេលគេចុះថ្លៃ"ឡាយឡុង" រកកន្លែងទៅវិស្សមកាលចំណាយលុយតិចសន្សំលុយសម្រាប់កូនរៀនឱ្យបានឆ្ងាយ... ។ល ។ ៥ឆ្នាំក្រោយមកបុរសជាប្ដីបានប្ដូរការងារបានប្រាក់


គ្រួសារធំរួមកម្លាំងគ្នាជាគ្រួសារអ្នកមាន

ចំណូលច្រើនជាងមុនការងារថ្មីក៏ចូលចិត្តនឹងធ្វើរីឯប្រពន្ធក៏ជាអ្នកកាន់កាប់លុយច្រើនជាងមុន ហើយចូលរៀនសូត្របន្ថែមខាងវិជ្ជាគ្រប់គ្រងលុយទៅស្ដាប់ "សេមិណា"នានា ។ ទាំងពីរនាក់ស្រុះស្រួលគ្នាមិនទិញរបស់ថ្មីណាដែលទិញមកហើយតម្លៃវាស្រុតចុះភ្លាមនោះទេ បើត្រូវតែទិញ ដូចជាទិញឡានជិះ ក៏វិនិយោគមិនឱ្យប៉ះពាល់ដល់ប្រាក់គ្រោងទុកសំរាប់ឱកាសបើវាជាចាំបាច់ដែរ ដូចេះទៅទិញឡានជំនុំតម្លៃថោកមានការធានាគ្រប់គ្រាន់ថាប្រើបានច្រើនឆ្នាំមិនមានការជួសជុលអ្វីធំដុំ ហើយស្របនឹងបំណងប្រើប្រាស់វាផង មុននឹងហ៊ានទិញឡានថ្មីដែលនឹងចុះតម្លៃខ្លាំងភ្លាម ហើយក៏លំបាកនឹងចំណាយលុយដើម្បីមុខមាត់ដែរ ដល់លក់ទៅវិញក៏បានប្រាក់គួរសមមកវិញដែរ ។ ចំណែកឯរបស់ប្រើប្រាស់ក្នុងផ្ទះវិញ អ្នកទាំងពីរយល់ស្របគ្នាថា "បើអង្គុយនៅតុបាយតូនឹងកៅអីនោះមានតួរនាទី២ គឺជារបស់បូរាណដ៏មានតម្លៃដែលជាតុបាយផង នឹងជាវិនិយោគលើពេលវេលាកាន់តែយូរកាន់តែមានតម្លៃផង"។ មិនយូរប៉ុន្មានប្ដីប្រពន្ធនេះសន្សំលុយបានច្រើន បើកហាងពាណិជ្ជកម្មមួយមានកូនប្រុសស្រី៣នាក់មិត្រភ័ក្ដ្រនឹងក្រុមញាតិសន្ដាន ពីព្រោះអ្នកទាំងពីរយល់ថា មានញាតិមិត្រច្រើនបង្កើតភាពរីករាយបានច្រើន ហើយចំណាយលុយតិចជាងភ្ញៀវក្នុងទំនាក់ទំនងពាណិជ្ជកម្ម។ បុរសជាប្ដីនិយាយថា "បើកហាងខ្លួនឯងវាធានាភាពឯករាជ្យខាងទ្រព្យធន់ប្រាក់ចំណូលច្រើនក្នុង១ម៉ោងធ្វើការ ហើយប្រពន្ធខ្ញុំនៅគ្រប់គ្រងប្រាក់ចំណូលក្នុងគ្រួសារដដែលដូចតែពីកាលទើបនឹងការរួចអីចឹងដែរ"។

បុរសម្នាក់ទៀតនិយាយពីការទិញផ្ទះថា "ខ្ញុំមិនដែលទិញផ្ទះតាមតម្លៃដែលគេដាក់នោះទេ ត្រូវតែមានចន្លោះដែលគេអាចតថ្លៃបានជាដំរាប ឬខ្ញុំស្វែងរកផ្ទះដែលសម្បូរអ្នកមានរស់នៅជុំវិញ គឺត្រូវទិញឱ្យបានថោក ដូចជាទិញពីអ្នកប្រញាប់លក់ បកងឱកាសដែលសេដកិចដលរលំនៅតំបន់ល្អផ្ទះមិនចុះថ្លៃទេ ដោយទាំងអស់គ្នាជាម្ចាស់ផ្ទះគេខំរៀបតំបន់ទាំងអស់គ្នា ដើម្បីរក្សាតម្លៃឱ្យនៅតែខ្ពស់ជានិច្ចនៅតំបន់អ្នកក្រផ្ទះមិនឡើងថ្លៃទេ"។ អ្នកមាន "ចរិកជាអ្នកមាន" គេជ្រើសរើសកន្លែងល្អកន្លែងថ្លៃសម្រាប់រស់នៅ ពីព្រោះនៅតំបន់នោះ ស្រស់ស្អាត មានសន្ដិសុខ មានសាលារៀនល្អសម្រាប់កូនមានមិត្តភក្ដ្រជាអ្នកមានពូជមានការអបរំល្អ មិនអាចជាជម្រកនៃក្រុមខូចខិលធានាជីវភាពហ៊ឹងហ្អនឹងធ្វើគម្រោងយូរយាបាន ។ ផ្ទះដែលគេនៅទៀតសោត បើនឹងជួសជុល ឬកែឆ្នៃចរិកអ្នកមានគេនិយាយថា "ខ្ញុំចូលចិត្តប្រើជាងមានវិជ្ជាជីវៈសម្រាប់ជួសជុលឬតម្លើងអ្វីឱ្យពីព្រោះនឹងបានរបស់ប្រើបានយូរអង្វែងសន្សំប្រាក់លើថ្លៃប្រើប្រាស់បាន ហើយឈ្នួលធ្វើការឱ្យនៅថោកជាងធ្វើខ្លួនឯង ឬធ្វើដោយជាងគ្មានអាជ្ញាប័ណ្ណគឈគ្មានចំណេះជ្រៅជ្រះ"។

ជាទូទៅនរណាក៏ប្រាថ្នាចង់ក្លាយទៅជាអ្នកមានដែរ តែអត្ថបទដែលលោកអ្នកកំពុងតែអាននេះ ណែនាំឱ្យយើងប្រើប្រាស់"ចរិកអ្នកមាន" ក្នុងជីវភាពរាល់ថ្ងៃ ប្រាក់"សន្សំតក់ៗ" នឹងកើតឡើងស្ថានភាពសេដ្ឋកិច្ចក្នុងគ្រួសារនឹងប្រែប្រួលទៅជាប្រសើររាល់ថ្ងៃ រហូតដល់បានក្លាយជា "អ្នកមាន"។ អ្វីដែលបានអធិប្បាយខាងលើ មិនមែនជា "បច្ចេកទេស"អ្វីទេ តែជាស្មារតី ជាចារិក ដែលនឹងរំលឹកសកម្មភាពរាល់ថ្ងៃសម្រាប់សន្សំលុយ...មនុស្សគ្រប់រូបអាចនឹងក្លាយទៅជា"អ្នកមាន" ដោយមិនចាំបាច់មានវិជ្ជាខ្ពង់ខ្ពស់មានដើមទុនសម្រាប់វិនិយោគទេ តែពេលវេលានឹងគម្រោងវែងឆ្ងាយមួយ ដូចជាពេលវេលា៣០ឆ្នាំនៃជីវិតរបស់យើងយ៉ាងតិចនឹងការអនុវត្តន៍គម្រោងនោះ ឱ្យបានខ្ជាប់ខ្ជួននឹងទទួលជោគជ័យជាប្រាកដ ។

សូមអានឡើងវិញនូវអត្ថបទសង្ខេបទាំង៦ភាគនៃជំនួយដល់ស្មារតីតំឡើងសេដ្ឋកិច្ចគ្រួសារនេះ លោកអ្នកនឹងឃើញថា "ការចង់មានមិនមែនជាអំពើលោភលន់ទេ"តែជាគំរូនៃជីវិតធម្មតាមួយដែលតឹងតែងព្យាយាម នឹងប្រាកដនិយម ហើយក៏ក្លាយជា "ទម្លាប់រស់នៅមួយ"ដែលបើធ្វើតាមបាននឹងទទួលផលល្អភ្លាមសម្រាប់ខ្លួនឯង។ ដូច្នេះត្រូវតែមានមហិច្ឆតា"ចង់ធ្វើជាអ្នកមាន" ពិតប្រាកដ មិនមែនមានតែសំបកក្រៅនោះទេ គឺធ្វើដើម្បីជីវភាពប្រសើរ ដើម្បីវង្សត្រកូលខ្មែរគំរូ នឹងដើម្បីកូនចៅបងប្អូនមិត្តភ័ក្ដិមានពូជជា "មហាសេដ្ឋី"ត២គ្នាបាន ជាពិសេសឱ្យធ្វើចាប់ពីពេលនេះភ្លាមទៅកុំចាំ"ចាស់ជ្រុល"សិមផ្ដើមមិនបានលទ្ធផលមកដល់មុនផុតជីវិតខ្លួនទេ តែយ៉ាងហោចណាស់ ក៏បានបង្រៀនកូនចៅឱ្យមានទម្លាប់ដ៏មានប្រយោជន៍ថ្មីមួយដែរ តែបើ"មិនចង់មានប្រាកដជានៅតែក្រ"ដដែលមិនអាចជួយនរណាបានក្រៅតែពីសំដីគ្មានឥទ្ធិពលតែគ្មានអំនួតនេះទេ ៕

**(ចប់បរិបូរណ៍)**

# ខ្មែរអាមេរិកាំងដែលជោគជ័យជាងគេបង្អស់នៅសហរដ្ឋអាមេរិក

**ដោយ : ខ្មែរផុស ស.រ.អា.**

នាឱកាសប្រារព្ធ"ទិវាកេរ្តិ៍ដំណែលវប្បធម៌អាស៊ីប៉ាស៊ីហ្វិក"ប្រចាំខែឧសភានៅសហរដ្ឋអាមេរិក រៀបចំឡើងជារាត្រីសមោសរកិត្តិយសនៅភោជនីយដ្ឋាន"ហុងកុង"ដោយ"ខ្មែរផុសស.រ.អា"ថ្ងៃទី២ខែឧសភាឆ្នាំ២០១៤ យើងបានអញ្ជើញឯកឧត្តម ស៊ីចាន់ ស៊ីវ អតីតឯកអគ្គរដ្ឋទូតអាមេរិកាំងមកជាវាគ្មិនកិត្តិយសក្នុងពិធីជប់លៀងរាត្រីជូនពលរដ្ឋអាស៊ីនៅឡូវែលរដ្ឋ"ម៉ាសាឈូសេត"នោះ ។ បងប្អូនខ្មែរជាច្រើន មិនបានស្គាល់ថា ស៊ីចាន់ ស៊ីវ ជានរណាដែលយើងសូមជូនជីវប្រវត្តិសង្ខេបដូចតទៅ :

លោក ស៊ីចាន់ ស៊ីវ មានអាយុ៦៦ឆ្នាំ មានភរិយាឈ្មោះ ម៉ាថា សព្វថ្ងៃរស់នៅ "សន់អង់តូនីញ៉ូ" នៃរដ្ឋ"តិចសាស់" ។

លោក ស៊ីចាន់ ស៊ីវ បានទទួលឋានៈជា "ឯកឧត្តម" គឺនៅពេលដែលលោកបានទទួលដំណែងជាឯកអគ្គរដ្ឋទូតតំណាងឱ្យសហរដ្ឋអាមេរិកប្រចាំអង្គការសហប្រជាជាតិពីឆ្នាំ២០០១-២០០៦។ ដើម្បីអាចទទួលមុខងារដ៏សំខាន់បំផុតនេះសម្រាប់ការពារផលប្រយោជន៍ជូនស.រ.អា លោកបានទទួលការតែងតាំងដោយមានការគាំទ្រជាឯកច្ឆន្ទពីសភាអាមេរិកាំង ដែលនាំឱ្យលោកចូលក្នុងប្រវត្តិសាស្ត្រនៃខ្មែរភៀសខ្លួននឹងជាប្រជាជនអាស៊ីអគ្នេយ៍ដំបូងបំផុតដែលមានឋានៈខ្ពង់ខ្ពស់ជាងគេបង្អស់ក្នុងរដ្ឋបាលផ្លូវការនៅសហរដ្ឋអាមេរិកនេះ ។

បន្ទាប់ពីរងគ្រោះពីរបបកុម្មុយនីស្តនៅកម្ពុជាមកលោក ស៊ីចាន់ ស៊ីវ បានភៀសខ្លួនមកដល់សហរដ្ឋអាមេរិកឆ្នាំ១៩៧៦ មកតាំងទីរស់នៅរដ្ឋ"កូណិចទីកិត"ផ្តើមកសាងជីវិតជាមួយនឹងទ្រព្យស្តួចស្តើង ដូចជាក្រមាបង់ក"ម៉ែថែក"១ ថង់ទទេសម្រាប់ដាក់អង្ករ១ និងប្រាក់២ដុល្លារ ។ បន្តិចក្រោយមកលោកប្តូរទីកន្លែងទៅនៅទីក្រុង "ញូយ៉ក" ប្រកបមុខរបរបើកឡានតាក់ស៊ី នៅទីនោះលោកបានចុះឈ្មោះចូលរៀនរហូតបានសញ្ញាប័ត្រ"ម៉ាស្ទ័រ"នៅមហាវិទ្យាល័យ"កូឡុមប៊ីយ៉ា"ខាងកិច្ចការអន្តរជាតិនៅឆ្នាំ១៩៨១។ ឆ្នាំ១៩៨៣ លោកបានជួបនារីរដ្ឋតិចសាស់"ម៉ាថា" ហើយរៀបការជាភរិយារួមរស់រហូតសព្វថ្ងៃនេះ ។

លោកបានជួយជ្រោមជ្រែងយ៉ាងសកម្មប្រកបដោយជំនឿយ៉ាងមុតមាំ អស់រយៈពេល៩ឆ្នាំជាកម្លាំងដល់គណបក្ស"សាធារណរដ្ឋ"អាមេរិកាំង រហូតដល់លោក ជច អេចឌិបិលយូប៊ូស បានជាប់ឆ្នោតជាប្រធានាធិបតី ហើយលោកស៊ីចាន់ ស៊ីវ ក៏បានទទួលការតែងតាំងជាអនុប្រធានក្រុមជំនួយការប្រធានាធិបតីនៅសេតវិមាន ហើយនឹងធ្វើជា"អនុប្រធានជំនួយការរដ្ឋលេខាធិការក្រសួងការបរទេស"ឆ្នាំ១៩៨៩-៩៣ មុននឹងក្លាយជា"ឯកអគ្គរដ្ឋទូតអាមេរិកាំងប្រចាំអ.ស.ប." នៅ៨ឆ្នាំក្រោយមកទៀត។

លោកបានបញ្ចេញស្នាដៃនិពន្ធរបស់លោកក្នុងសៀវភៅ"ឆ្អឹងមាស-Golden Bone" ជាទម្រង់រឿង"ក្តីស្រម័យរបស់ជនជាតិអាមេរិកាំង"


Sichan siv

ដែលបានក្លាយទៅជាសៀវភៅអន្តរជាតិ លក់ដាច់ជាងគេបង្អស់។ បន្ទាប់មកលោកចេញផ្សាយសៀវភៅមួយទៀតមានឈ្មោះថា "ពាក្យមាស-Golden Words" ហើយចុងក្រោយបង្អស់នេះទៀត លោកទើបនឹងបានចេញផ្សាយសៀវភៅថ្មីមួយទៀតឈ្មោះថា "ប្រទេសមាស- Golden state" ដែលលោកអាចនឹងចុះហត្ថលេខាលើសៀវភៅទាំងនោះ ចែកជូនបងប្អូននៅឡូវែលនេះផង។

ឯកឧត្តម ស៊ីចាន់ ស៊ីវ ជាវីរជនដែលបានទទួលកិត្តិយសនិងការកោតសសើរជាច្រើនពីសហគមន៍អាមេរិកាំង មានជាអាទិ៍ TheGeorge H.W. Bush Award of Oustanding Public Service.មួយទៀត.U.S. Army Commander's Award and Brasillian of Art, Culture and Histoy Honors។ រីឯនៅសហគមន៍ខ្មែរដែលជាដើមកំណើតរបស់លោក លោកបានចូលរួមក្នុងសហគមន៍ទូលំទូលាយ ជាលក្ខណៈអង្គការនឹងមូលដ្ឋានគ្រឹះ លោកជាប្រធានកិត្តិយសនៃក្រុងខ្មែរនៅឡុងប៊ិច- កាលីហ្វ័រញ៉ា ពីឆ្នាំ២០០៦ មកដល់សព្វថ្ងៃ ។ នៅរដ្ឋ"ម៉ាសាឈូសែត"នេះ ជាសមាជិកក្រុមប្រឹក្សារបស់ American University of Phnom Penh ដែលស្ថាបនាឡើងដោយ "Middlesex Community College of Massachusetts ។ លោកជាអ្នកផ្តល់ការពិគ្រោះយោបល់ជាយុទ្ធសាស្ត្រ ហើយក៏ជាវាគ្មិនសម្រាប់ផ្តល់ការលើកទឹកចិត្តនៅស.រ.អា.នេះ នឹងក្នុងពិភពលោកដែរ ។

ខ្មែរផុសស.រ.អា អញ្ជើញឯកឧត្តម ស៊ីចាន់ ស៊ីវ មកជាកិត្តិយសក្នុងពិធី "ទិវាកេរ្តិ៍ដំណែលវប្បធម៌អាស៊ីប៉ាស៊ីហ្វិក" គឺមានបំណងណែនាំ "វីរជនដើមកំណើតខ្មែរ"ម្នាក់ ដែលជិតជាប់នូវ "ក្តីស្រម័យអាមេរិកាំង" ហើយទទួលបានជោគជ័យជាងគេបំផុតមកបង្ហាញជូនបងប្អូនអាស៊ីនៅម៉ាសាឈូសែតបន្ទាប់ពីមានប្រជាជនអាស៊ីអគ្នេយ៍តាំងទីនៅស.រ.អា.តាំងពីជាង៣០ឆ្នាំមក។ លោកនឹងមកជួបបងប្អូនសហគមន៍ខ្មែរ អាស៊ី និងអាមេរិកាំង ដើម្បីបង្ហាញជាគំរូនៃការ "លើកតម្កើង-បន្តកេរ្តិ៍ដំណែលវប្បធម៌ដូនតា"ជាមួយគ្នាក្នុងទិវាជប់លៀងរាត្រីនេះ ៕

## AMBASSADOR SICHAN SIV

In 2001 after unanimous confirmation by the Senate, he was appointed by President George W.

Bush as an ambassador to the United Nations, where he sewed until 2006. In June 2005,

Ambassador Siv represented the United States at the 60th anniversary of the U.N., in the footsteps

of Presidents Truman in 1945, Eisenhower 1955, Johnson 1965, and Clinton 1995.

Prior to sewing as the United State Ambassador to the United Nations, Ambassador Siv had worked at the White House as Deputy Assistant to President George H.W. Bush and at the state Departmentas Deputy Assistant Secretary from 1989-1993.

He holds a master degree in international affairs from Columbia University and is an international bestselling author of Golden Bones, an American dream story, and more recently he published the poetry book Golden Words.

Ambassador Siv was born in Cambodia in year 1948, Pochentong, Cambodia.

He escaped Cambodia's killing fields in 1976 and was settled as refugee in Connecticut with his mother's scarf, an empty rice bag and $2.

He is the recipient of numerous awards and honors, including the George H.W. Bush Award for Outstanding Public Service, U.S. Army Commander's Award and Brazilian Academy of Art, Culture and History Honors. In the Cambodian community, Ambassador Siv involves in nationwide community organizations and foundations. He was the honorary Chairman of the Cambodia Town of Long Beach, California (2006 and currently, he is a board member of American University of Phnom Penh established by Middlesex Community College of Massachusetts. He provide global strategic advice and gives motivational speeches around the United States and the world. He is married to the former Martha Pattillo of Pampa and they reside in Texas.




CONWAY
INSURANCE AGENCY

រយៈពេល២៥ឆ្នាំ ភ្នាក់ងារធានារ៉ាប់រងខុនវេយបានបម្រើសហគមន៍ដោយធានារ៉ាប់រងគ្រប់មុខប្រកបដោយគុណភាពនៅតំបន់ញូអ៊ីងឡែន ។

យើងខ្ញុំជាភ្នាក់ងារបំពេញសេវាគ្រប់មុខដូចខាងក្រោម :

**ការធានារ៉ាប់រងគ្រួសារ**

- រថយន្ត
- ផ្ទះ
- ផ្ទះល្វែង
- គ្រឿងអលង្ការ
- វត្ថុសិល្បះ
- វត្ថុបុរាណ

**ការធានារ៉ាប់រងជំនួញ**

- អចលនវត្ថុ
- សុវត្ថិភាពជំនួញ (Liability)
- សុវត្ថិភាពជំនាញ (Professional Liability)
- រីកខឹខម (Worker's Compensation)
- បនដស៍ (Bonds)
- អ្នកមើលថែឡាន និងការ៉ាស់ឡាន
- ធានារ៉ាប់រងពិការភាព និងជីវិត
- កម្មវិធីពិសេសផ្សេងៗទៀត



77 E. Merrimack Street. Lowell, MA 01852
Tel: 978-454-5054|Fax 978-453-2480
www.conwayinsurance.com
សូមទាក់ទងមក : ហ្វីលីប មុត, អ្នកគ្រប់គ្រង

# ក្រុមរបាំអង្គរអបអរសាទរសិល្បៈវប្បធម៌ខ្មែរនៅសាកលវិទ្យាល័យយូម៉ាស

ដោយ : សុខា

**យូម៉ាសឡូវែល:** រៀងរាល់ឆ្នាំ នៅខែមេសា ក្រុមរបាំអង្គរតែងរៀបចំឱ្យមានការសម្តែងអប្សរាផ្ទរាំជូនដល់ប្រជនខ្មែរ និងបរទេស ។ ឆ្នាំកន្លងទៅ ក្រុមរបាំអង្គររៀបចំការសម្តែងនៅសាលអនុស្សាវរីយ៍ឡូវែល ។ ដោយឡែកឆ្នាំ២០១៤នេះក្រុមរបាំអង្គរក្រោមការចូលរួមឧបត្ថម្ភពីសាលាយូម៉ាសឡូវែលបានរៀបចំការសម្តែងអប្សរាផ្ទរាំនៅអគារសិល្បៈ ឌឺហ្គីន (Durgin Hall) កាលពីថ្ងៃទី៣ ខែមេសាឆ្នាំ២០១៤ នៅវេលាម៉ោង៧ និង ៣០នាទីយប់ ។

របៀបវារៈនៃកម្មវិធីមានការសម្តែងដែល

តទៅទំព័រទី ១៦

# Angkor's stars shine with Apsara Dancing Stones

By James Ostis

The lights dim. An airplane is about to land. The public address announcer warmly greets the guests "Welcome to Phnom Penh."And with those words on April 3rd, an audience of over 500 at UMass Lowell's Durgin Hall was transported on a magical journey through Cambodia's past and present at the second ever performance of Angkor Dance Troupe's Apsara Dancing Stones.



Apsara Dancing Stones follows the story of Khemera, a Cambodian-American student traveling to Angkor Wat with friends. However,his real journey begins when he falls asleep and witnesses the ancient story of the Apsaras carved into Angkor Wat's stones, falling in love with the beautiful Apsara goddess along the way. The performance is a truly unique artistic achievement blendinga variety of traditional Cambodian dance styles with modern American dance and storytelling elements while **Continued to page 16**




# GATEWAY FAMILY DENTAL

www.gatewayfamilydental.com • (978) 455-5044

151 WARREN STREET, SUITE 120 LOWELL, MA 01852 (Same building as Social Security/near the courthouse)



**DR. SERENA B. CHUOP**

Dr. Serena B. Chuop was born in Cambodia. She received her Bachelor of Science from Boston University and went on to graduate from Boston University Goldman School of Dental Medicine in the year 2000. For over 13 years, she has been in private practices providing all aspects of General Dentistry. Her state of the art dental practice includes digital x-rays, paperless patient chart system, and new dental equipments.




**WE PROVIDE ALL SERVICES INCLUDING: យើងផ្តល់នូវសេវាដូចខាងក្រោមនេះ**

- CLEANING
- FILLINGS
- BONDINGS
- COSMETIC DENTISTRY
- CROWNS/BRIDGES
- DENTURES
- IMPLANTS
- EXTRACTIONS
- TEETH WHITENING
- VENEERS
- EMERGENCY DENTAL TREATMENT
- ROOT CANAL TREATMENT
- DENTAL SERVICES TO CHILDREN

- សំអាតធ្មេញ
- បំពេញធ្មេញប្រហោង
- ថ្នាំសំរាប់ការពារធ្មេញ
- ធ្មេញពាក់ជុំនួសធ្មេញដែលបាក់
- ក្រាសធ្មេញពាក់
- ដាំធ្មេញតាមរន្ធធ្មេញចាស់
- ដកធ្មេញ
- ធ្វើធ្មេញឱ្យសស្អាត
- វីវនីស្រោបធ្មេញ
- ព្យាបាល និងការពារធ្មេញជាទៀងទាត់
- ព្យាបាល ឫសថ្គាមធ្មេញ
- សេវាព្យាបាលសំរាប់កុមារ

Free Teeth Whitening Kit
(with new patient´s x-ray, exam, cleaning at regular price)

MOST DENTAL INSURANCES ACCEPTED
INCLUDING MASSHEALTH
FINANCING AVALIABLE
យើងទទួលនូវគ្រប់ អ៊ិន ស៊ូរិន
Masshealth
យើងសំរួលការបង់ថ្លៃព្យាបាលប្រចាំខែ
CALL FOR YOUR FREE CONSULTATION
(978) 455-5044

# ចៅក្រមកំពូល អាល់ប៊ី សាក់ស៊្ប លីម៉ា ក្បូវី និងអេមីបៀល ជាជ័យលាភី បីរូបក្នុងចំណោមអ្នកប្រាជ្ញសន្តិភាពរបស់មូលនិធិសន្តិភាពគ្រីលី

**ដោយ : សុខា**

សាកលវិទ្យាធិការ ម៉ាទី មីហាន

ចៅក្រមចូលនិវត្តន៍ អាល់ប៊ី សាក់ស៍

ពានរង្វាន់ណូបែលសន្តិភាព លីម៉ាក្បូវី

អ្នកស្រី អេមីបៀលស្ថាបនិក មូលនិធិ អេមី

**ក្រុងឡូវែល:** ក្រៅពីវត្តមាននៃតារាល្បីល្បាញម៉ារីល ស្រ្ទីប បង្ហាញខ្លួនក្នុងឡូវែល ក្រុងមួយនេះ តាមរយៈការរៀបចំពីសាលាយូម៉ាសឡូវែលដែលមានសាកលវិទ្យាធិការ ម៉ារទី មីហាន (Marty Meehan) ជាប្រធានបានទទួលស្វាគមន៍អ្នកប្រាជ្ញផ្នែកសន្តិភាព (Peace Scholars) ចំនួនបីរូប ក្នុងនោះរួមមានអ្នកស្រី លីនដា បៀល (Linda Biehl) អ្នកស្រី លីម៉ា ក្បូវី (Leymah Gbowee) និងចៅក្រមកំពូល អាល់ប៊ី សាក់ស៍ (Albie Sachs)។ អ្នកទាំងបីគឺជាអ្នកប្រាជ្ញសន្តិភាពនៃមូលនិធិសន្តិភាពឈ្មោះថា ហ្គ្រីលី។

អ្នកស្រីលីនដា បៀល គឺជាស្ថាបនិករបស់មូលនិធិ អេមី បៀល ឬហៅជាភាសាអង់គ្លេសថា អេមីបៀលហ្វោនដេស្សិន។ ឈ្មោះមូលនិធិនេះគឺយកតាមឈ្មោះកូនស្រីបង្កើតរបស់អ្នកស្រី គឺ អេមី។ អេមី ជានិស្សិតអាហារូបករណ៍របស់ហ្វ៊ុលប្រៃក្នុងប្រទេសអាហ្វ្រិកខាងត្បូង។ ជាអកុសល នាងត្រូវបានគេសម្លាប់ ព្រោះតែសកម្មភាពដែលអេមីធ្វើក្នុងនាមជានិស្សិតចេញមុខការពារប្រយោជន៍ដល់ជនជាតិអាហ្វ្រិកដែលគ្មានសម្លេងក្នុងសង្គមអាហ្វ្រិកខាងត្បូងដូចជាបញ្ហាសិទ្ធមនុស្សរបស់ពលរដ្ឋស្បែកខ្មៅក្នុងប្រទេសនេះជាដើម។

អ្នកស្រី លីនដា បៀល ក៏បានផ្តួចផ្តើមបង្កើតមូលនិធិអេមីនេះឡើងក្នុងគោលបំណងរំឭកដល់កូនស្រីអ្នកស្រីផ្ទាល់ និងបង្ហាញពីអហោសិកម្មដែលអ្នកស្រីមានចំពោះជនដៃដល់ដែលសម្លាប់អេមី កែប្រែឃាតករឱ្យក្លាយជាបុគ្គលប្រកបសម្មាអាជីវរ និងការផ្សះផ្សារ។ អ្នកស្រីនិងស្វាមី ភិថី បៀល ស្ថិតក្នុងគន្លងតែមួយក្នុងរឿងនេះ។ គួរបញ្ជាក់ថា ភីថី បៀលបានលាចាកលោកហើយ។ អ្នកស្រី បៀល បានក្លាយជាអ្នកប្រាជ្ញសន្តិភាពសម្រាប់មូលនិធិគ្រីលីនៃសាកលវិទ្យាល័យយូម៉ាស ឆ្នាំ២០០៨។

ឆ្នាំ២០១១ អ្នកស្រីលីម៉ា ក្បូវី ទទួលពានរង្វាន់ណូបែលសន្តិភាពអំពីការតស៊ូរបស់អ្នកស្រីដែលដឹកនាំចលនាតស៊ូដោយសន្តិភាពប្រឆាំងនឹងរបបគ្រប់គ្រងរបស់អ្នកដឹកនាំថាយឡឺ និងបាននាំទៅដល់ការបញ្ចប់សង្គ្រាមក្នុងប្រទេសឡាយបឺរៀនាឆ្នាំ២០០៣។ ឆ្នាំ២០១១ដដែលនោះ អ្នកស្រីលីម៉ា បានក្លាយជាអ្នកប្រាជ្ញសន្តិភាពរបស់មូលនិធិសន្តិភាពគ្រីលី នៃសាកលវិទ្យាល័យយូម៉ាស។

ឆ្នាំ២០១៤ អ្នកប្រាជ្ញសន្តិភាពរបស់មូលនិធិសន្តិភាពគ្រីលី គឺចៅក្រមកំពូលនៃប្រទេសអាហ្វ្រិកខាងត្បូងគឺ អាល់ប៊ី សាក់ស៍។ អាល់ប៊ី សាក់ស៍ជាចៅក្រមកំពូលដែលចូលនិវត្ត និងជាអ្នកនិពន្ធសៀវភៅចំនួនពីរគឺ The Soft Vengeance of a Freedom Fighter, New Edition nig The Strange Alchemy of Life and Law។

អ្នកទាំងបីរូប បានផ្តល់នូវបទបង្ហាញ និងមានប្រសាសន៍ក្នុងកម្មវិធីជាច្រើនដែលរៀបចំដោយសាលាយូម៉ាសឡូវែលក្នុងនោះរួមមាន

**តទៅទំព័រទី១៥**


**MARCOTTE LAW FIRM**

**ក្រុមហ៊ុនមេធាវី Marcotte**

45 MERRIMACK STREET
LOWELL, MASSACHUSETTS
(978) 458-1229

- សេចក្តីអន្តរាយដល់បុគ្គល
- សំណងបុគ្គល
- ពិការភាពដោយសន្តិសុខសង្គម
- បទព្រហ្មទណ្ឌផ្លូវភេទ និងថ្នាំញៀន
- ច្បាប់គ្រួសារ និងផែនការអចលនទ្រព្យ
- បណ្តឹងវិវាទទូទៅ
- ច្បាប់ធានារ៉ាប់រង
- ការរំលោភបទព្រហ្មទណ្ឌ
- គ្រោះថ្នាក់ចរាចរណ៍
- គ្រោះថ្នាក់នៅការដ្ឋាន
- បំណុលអចលទ្រព្យ
- បើកបរនៅពេលស្រវឹង និងប្រព្រឹត្តបទល្មើសពេលធ្វើចរាចរណ៍

**មានបុគ្គលិកនិយាយភាសាខ្មែរលោកអ្នកអាចហៅទូរស័ព្ទមកក្រុមហ៊ុនយើងខ្ញុំដើម្បីពិគ្រោះ**

(978) 458-1229

www.marcottelawfirm.com



K Pharmacy
280 Westford Street
Lowell, MA 01851

Grand Opening!

DEGREE IN DOCTOR OF PHARMACY
- Over 10 years of experience in retail pharmacy
- Offer a wide variety of grocery items
- Accept most major insurances
- Largest khmer pharmacy in Lowell
- Friendly English and khmer speaking staff
- Large parking lot



Drop Off
Pharmacy
Patient Consultation
Pick Up

Hours of Operation
Monday - Saturday: 9AM - 7PM
Sunday: 9AM - 3PM
Phone: 978-455-8764
Phone: 978-455-8375

# សត្រូវប្រជាជនការពិតនៃការសម្លាប់រង្គាលពីបងធំទីពីរ នួន ជា ភាពយន្តឯកសាររបស់ សម្បត្តិ ថេត

**ដោយ : សុខា**

**ខេមប្រ៊ីឌជ៏, ម៉ាសាឈូសេត :** រឿងរ៉ាវនៃឧក្រិដ្ឋកម្មប្រល័យពូជសាសន៍ដែលបានកើតឡើងនៅក្នុងប្រទេសខ្មែរសម័យឆ្នាំ៧៥ដល់៧៩ នៅតែជាចម្ងល់សម្រាប់ខ្មែរដែលរស់រានមានជីវិតឆ្លងកាត់របបនេះដល់សព្វថ្ងៃ និងខ្មែរជំនាន់ក្រោយព្រមទាំងការស្វែងយល់អំពីបញ្ហានេះពីសំណាក់អន្តរជាតិ ។

មួយក្នុងចំណោមការផលិតជាច្រើនដែលរុករកការពិតនៃសម័យសម្លាប់រង្គាល គឺភាពយន្តឯកសាររបស់ផលិតករ ថេត សម្បត្តិ ដែលមានអ្នកផលិតភាពយន្តឯកសារសញ្ជាតិអង់គ្លេស រ៉ប់ លេមឃីន (Rob Lemkin) ធ្វើការជាមួយលោក។ លោកបានចំណាយពេល និងដាក់ចិត្តយ៉ាងពេញទំហឹងក្នុងការព្យាយាមប្រមូលប្រភពសេចក្តីបកស្រាយពីបុគ្គលដ៏សំខាន់ម្នាក់ដែលត្រូវបានគេដាក់ឈ្មោះថា ជាបងធំទីពីរក្នុងចំណោមក្បាលម៉ាស៊ីនដឹកនាំនៃអង្គការខ្មែរក្រហម ។ បងធំទីពីររូបនោះ គឺលោក នួន ជា បច្ចុប្បន្នអាយុ ៨៦ ឆ្នាំ កំពុងស្ថិតនៅក្នុងពន្ធនាគារក្នុងនាមជាទណ្ឌិតប្រឈមមុខនឹងការកាត់ក្តីក្នុងសវនាការខ្មែរក្រហមពីបទប្រព្រឹត្តឧក្រិដ្ឋកម្មប្រឆាំងមនុស្សជាតិ ។






ពីឆ្វេងទៅស្តាំ ហ្គ្រេកហ្គោរីស្តែនថុន. សម្បត្តិ. គ្រីស ដឺឆឺត.ហូមី បាបា

កិច្ចការ និងសមិទ្ធផលរបស់លោក ថេត សម្បត្តិ ក្នុងកុនទីមួយរបស់លោក គឺសត្រូវប្រជាជន ធ្វើឡើងប្រើពេលប្រមាណដប់ឆ្នាំ មុនពេលលោក នួន ជា ត្រូវបានតុលាការខ្មែរក្រហមកោះហៅ និងប្រគល់ខ្លួន ។

ពេលវេលាសេចក្តីព្យាយាមឃ្លាតពីប្រពន្ធ និងកូនពីរនាក់ ព្រមទាំងការផ្សងគ្រោះថ្នាក់ជាទុនដែលលោក ថេត សម្បត្តិ បានលះបង់ក្នុងគោលបំណងស្វែងរកការពិត ។ ផ្អែកតាមលោក ថេត សម្បត្តិ ដែលព្យាយាមស្វែងយល់ចូលទៅជិត និង ទទួលបានការទុកចិត្តពី នួន ជា លោកបាន អធិប្បាយពីចរិតលក្ខណៈបុគ្គល នួន ជា ថា ជាមនុស្សដែលប្រយ័ត្នប្រយែងបំផុតហ្មត់ចត់បំផុត ទម្រាំលោក នួន ជា ព្រមសហការជាមួយលោក ។

ភាពយន្តសត្រូវប្រជាជនត្រូវបានចេញផ្សាយនៅឆ្នាំ២០០៩ ហើយទទួលបានរង្វាន់ជាច្រើន ។ យ៉ាងណាមិញ ថេត សម្បត្តិ បញ្ជាក់ថា មានបញ្ហារសើបដល់រដ្ឋាភិបាលបច្ចុប្បន្នចេញពីស្នាដៃស្រាវជ្រាវរបស់លោកដែលនាំឱ្យលោកប្រឈមនឹងគ្រោះថ្នាក់ដល់ជីវិត ។ បច្ចុប្បន្ន ថេត សម្បត្តិ និងក្រុមគ្រួសារ រួមមានលោកប្រពន្ធ និងកូនប្រុសស្រីទាំងពីរកំពុងរស់នៅជាយក្រុងបុសស្តុនរដ្ឋម៉ាសាឈូសេតនៃសហរដ្ឋអាមេរិកដោយលោក ថេត សម្បត្តិ ទទួលបានអាហារូបករណ៍កម្មវិធីអ្នកប្រាជ្ញប្រឈមនឹងគ្រោះថ្នាក់ (Scholars At Risk) នៃសាកលវិទ្យាល័យហាវើដសម្រាប់ ឆ្នាំ២០១៣-២០១៤ ។

នៅថ្ងៃព្រហស្បតិ៍ទី ១៧ ខែមេសា ឆ្នាំ ២០១៤ នៅឯសហសាលសិក្សាខាផិនធឺសម្រាប់សិល្បៈភាពយន្តនៃសាកលវិទ្យាល័យហាវើដមានការដាក់បញ្ចាំងកុនសត្រូវប្រជាជនភ្ជាប់ទៅនឹងការពិភាក្សាពីវាគ្មិនក្នុងនោះរួមមានលោក ថេត សម្បត្តិ លោក គ្រីស្ត ដឺឆឺដ (Chris Decherd) ជាប្រធានកម្មវិធីព័ត៌មានផ្នែកភាសាខ្មែរនៅសារព័ត៌មានសម្លេងសហរដ្ឋអាមេរិកលោក ហ្គ្រេកហ្គោរី ស្តែនថុន (Gregory H. Stanton) ជាអតីតមន្ត្រីនៃស្តេតឌីផាតមិននៃសហរដ្ឋអាមេរិក (former State Department official) និងជាអ្នកផ្តួចផ្តើមអ្នកឃ្លាំមើកឧក្រិដ្ឋកម្មប្រល័យពូជសាសន៍ (Genocide Watch ) ឆ្នាំ ១៩៩៩ ។ អ្នកសម្របសម្រួលនៃក្រុមវាគ្មិន គឺលោក ហូមី បាបា (Homi K. Bhabha) ជានាយកមជ្ឈមណ្ឌល mahinRda ( Mahindra Center ) ។

បច្ចុប្បន្នលោក ថេត សម្បត្តិ កំពុងធ្វើការក្នុងកុនទី២ តាមរយៈទូរស័ព្ទ និងស្កែប តាមអិនធឺណិតដែលនឹងជាស្នាដៃទាញចេញពីកុនទី១ ពន្លេចនូវរឿងរ៉ាវ ស៊ីជម្រៅអំពីការសម្លាប់រង្គាលដែលផ្អែកតាមការបកស្រាយរបស់លោក ថេត សម្បត្តិ ក្នុងវគ្គសំណួរចម្លើយ នាល្ងាចនោះលោកថ្លែងថា រឿងនេះមានជាប់ទាក់ទងនឹងរដ្ឋាភិបាលកាន់អំណាចណាពេលបច្ចុប្បន្ន ហើយ ថេត សម្បត្តិ ប្រើឧបមាណវិធីនៃកុនទីពីររបស់លោកទៅនឹងគ្រាប់បែកដែលនឹងត្រៀមផ្ទុះប្រសិនបើស្នាដៃទីពីររបស់លោកសម្រេចជាស្ថាពរ ៕







## ការិយាល័យ មេធាវី ថំមាស ស្តាលីយ៉ាណូស

**Law Office of Thomas Stylianos Jr.**
**287 Appleton St. Lowell MA 01852**

- Immigration •អន្តោប្រវេសន៍
- Auto Crash •គ្រោះថ្នាក់រថយន្ត
- Divorce •លែងលះប្តីប្រពន្ធ

សូមទាក់ទង សោភា ឬ ធំ **978-459-5000 or 800-308-3766**
Only Licensed in Massachusets

# តារាសម្តែងល្បីល្បាញម៉ារីល ស្រ៊ីប ផ្តល់កិត្តិយសដល់យូម៉ាសឡូវែល

## Once-In-a-lifetime Experience for UMass Lowellian with Meryl Streep


Photo Courtesy of UMass Lowell

**ដោយ : សុខា**

**មជ្ឈមណ្ឌលសុងហ្គាស,ក្រុងឡូវែល:** ម្ចាស់ពានរង្វាន់អូស្ការចំនួនបីលើកក្នុងអាជីពសម្តែង គឺម៉ារីល ស្រ៊ីប បានផ្តល់កិច្ចសន្ទនាជាមួយសាស្ត្រាចារ្យផ្នែកអក្សរសាស្ត្រ អិនឌ្រឹស ឌូបឺសទីបី កាលពីថ្ងៃទី១ ខែមេសា ឆ្នាំ២០១៤។ កិច្ចសន្ទនានេះត្រូវបានអគ្គនាយកសាលាយូម៉ាស ម៉ារទី មីហែន វាយតម្លៃថា ជាឱកាសកម្រមានតែមួយលើកក្នុងមួយជីវិត ដែលនិយោជិត និងនិស្សិតយូម៉ាស ព្រមទាំងពលរដ្ឋក្នុងតំបន់នេះ បានទទួលបទពិសោធន៍ក្នុងការជួបផ្ទាល់ជាមួយបុគ្គលប្រកបដោយទេពកោសល្យ និងស្នាដៃក្នុងវិស័យភាពយន្តដូចជាម៉ារីល ស្រ៊ីប។

ឆ្លើយតបទៅនឹងភាពជោគជ័យនៃការគាំទ្រវត្តមានរបស់តារាល្បីល្បាញ ម៉ារីលស្រ៊ីបមកកាន់ឡូវែល នារាត្រីនោះ អ្នកចូលរួមមានប្រមាណ៣៦០០នាក់ ហើយកម្មវិធីនៃកិច្ចសន្ទនានេះ ប្រមូលបានថវិកាដល់ទៅ២៣ម៉ឺនដុល្លារសហរដ្ឋអាមេរិក។ ថវិកានេះ នឹងក្លាយជាអាហារូបករណ៍ដល់និស្សិតឆ្នើមពីររូបរបស់យូម៉ាស ដែលរៀនមុខជំនាញអក្សរសាស្ត្រអង់គ្លេស ។

កម្មវិធីនេះចាប់ផ្តើមនៅម៉ោង៧និង៣០នាទីយប់ និងបញ្ចប់នៅម៉ោង៩យប់ ក្នុងនោះសកម្មភាពដែលត្រូវបានប្រព្រឹត្តទៅក្នុងកម្មវិធីរួមមានការដាក់បង្ហាញឈុតឆាកខ្លីៗលើផ្ទាំងទូរ-ទស្សន៍នៃកុនដែលតារាម៉ារីល ស្រ៊ីប បានសម្តែង កិច្ចសន្ទនារវាង តារាម៉ារីល ស្រ៊ីប និងសាស្ត្រាចារ្យ អិនឌ្រឹស ឌូបឺសទីបីដែលជាពិធីករក្នុងកម្មវិធី ព្រមទាំងវេទិកាសួរសំណួរពីទស្សនិកជនទៅកាន់តារាម៉ារីលស្រ៊ីបដោយផ្ទាល់។ ក្នុងចំណោមចម្លើយទៅកាន់សំណួរជាច្រើនសារព័ត៌មានខ្មែរផុសបានផ្តោតយកនូវចម្លើយពីរដែលទទួលបានពីតារា ម៉ារីល ស្រ៊ីប ទី១ គឺបំណងប្រាថ្នារបស់ម៉ារីល ស្រ៊ីប បើមានជាតិក្រោយ គឺចង់ក្លាយជាតន្ត្រីករមួយរូបដោយនាងលើកហេតុផលថា តន្ត្រីអាចបំពេរអារម្មណ៍បម្រើដល់មនុស្សគ្រប់គ្នាដោយមិនមានរនាំងភាសា ឬឧបសគ្គដទៃទៀតឡើយ។ ទី២ គឺមុនចាប់ផ្តើមអាជីពជាតារាសម្តែងនាងបានបញ្ជាក់ថា មិនធ្លាប់គិតថានឹងចាប់យកអាជីពនេះពីមុនមកទេ។ ភ្ជាប់ទៅនឹងចម្លើយនេះនាងឆ្លៀតបញ្ចូលនូវពាក្យកំប្លែងមួយឃ្លាដែលនាងបញ្ជាក់ថា ធ្លាប់ឮពីតារាដទៃទៀតដែលល្បីល្បាញ ហើយដែលគេលើកឡើងថា "ខ្ញុំដឹងភ្លាមតាំងពីវិនាទីដំបូងដែលខ្ញុំកើត ថាខ្ញុំនឹងក្លាយជាតារា!"។

គួរបញ្ជាក់ផងដែរ មុនពេលដែលតារាម៉ារីល ស្រ៊ីប ពិតប្រាកដបង្ហាញខ្លួននៅលើឆាកអ្នករៀបចំកម្មវិធីបានពញ្ញាក់ស្មារតីនៃទស្សនិកជនទាំងអស់ក្នុងសាលដ៏ធំនៃសុងហ្គាសសិនធីតាមរយៈការបង្ហាញខ្លួនរបស់ស្ត្រីម្នាក់ដែលបន្លំខ្លួនជាតារាម៉ារីល ស្រ៊ីប។

តារាស្រី ម៉ារីល ស្រ៊ីប ត្រូវបានចាត់ទុកថាជាតារាកំពូលមួយរូបមានភាពប៉ិនប្រសប់ក្នុងការចាប់បានឆាប់រហ័សនូវតុងសម្លេងនៃភាសាបរទេស ហើយនាងជាតួឯកម្នាក់ដែលមានទេពកោសល្យក្នុងការសម្តែងតំណាងតួពិតក្នុងជីវិតពិត ដូចជាការដើរក្នុងតួនៃបុគ្គលិកលក្ខណៈរបស់នាយករដ្ឋមន្ត្រីអង់គ្លេស ម៉ាហ្គារែត ថាច់ឆឺ (British Prime Minister Margaret Thatcher) ក្នុងកុន "អាយអិន ឡេឌី" in "Iron Lady" តួកូនបារាំងក្នុងរឿង ជូលា និង ជូលី ឬ "Julie and Julia," និងកុនផ្សេងៗជាច្រើនទៀងមិនតិចជាង១០០តួ៕

វាចាថ្ងៃនេះដោយ ពិន សំខុន

# វីដេអូសិច នារីម្នាក់ ព្រះសង្ឃមួយអង្គ តើនរណាជាអ្នកខុស?



**លំនាំរឿង:** ខ្សែវីដេអូសិចមួយបានត្រូវចែកចាយយ៉ាងឆាប់រហ័សបំផុត កាលពីមុនឱកាសចូលឆ្នាំម្សាញ់យ៉ាងលឿនជាលើកដំបូងបង្អស់ជាងការលក់វីដេអូខ្មែរទាំងអស់នៅក្នុងសហគមន៍ខ្មែរ រហូតដល់រាយពាសពេញសកលលោក គឺជាខ្សែវីដេអូលួចថតនៅក្នុងកុដិនៃវត្តត្រៃរតនារាមថតដោយជនអានាមិកដែលទំនងជាព្រះសង្ឃជាងថតរូបមួយអង្គតួដែលបង្ហាញនៅក្នុងភាពយន្តនោះ គឺស្ត្រីចំណាស់ម្នាក់ដែលនៅស្រស់ស្អាតផ្ទូផង់នៅឡើយ ដែលគេអាចសំគាល់បានថា ជានារីសកម្មជនគាំទ្រ "វត្តខ្មែរឡូវែល"ឈ្មោះ "ម៉ាយា" នឹងបុរសសង្ហារមាឌមាំខ្មៅម្នាក់ទៀតដែលអាចសំគាល់យ៉ាងច្បាស់ថា ជាព្រះសង្ឃបញ្ញាវន្តមួយអង្គឈ្មោះ "គិមតេង" អ្នកទាំងពីរបានបង្ហាញក្បាច់ថែចង់ រហូតដល់បានខ្លួនប្រាណដូចគ្នាប្តីប្រពន្ធលួកល្អឹនជាមួយគ្នាមួយតួ នារាត្រីដ៏សែនសុខអ៊ីចឹងដែរ... តែការដែលធ្វើឱ្យគេចង់មើលខ្សែវីដេអូនោះ ពីព្រោះជារឿងអាសអាភាសរបស់មនុស្សកំពុងល្បីក្នុងសហគមន៍វត្តអារាមដែលគេស្គាល់ច្រើន ពិសេសទៅទៀតនោះ គឺការរួមភេទជាមួយស្ត្រីរបស់ព្រះសង្ឃម្នាក់ដែលជារឿងមិនគួរជឿប៉ះពាល់ដល់ការបំពានវិន័យសង្ឃដែលព្រះពុទ្ធបានហាមឃាត់។


ព្រះសង្ឃ ញៀម គិមតេង


ព្រះគ្រូចៅអធិការ សៅ ឃន

តទៅទំព័រទី ២០

*Now that your taxes are done, it is a good time to review your existing mortgage!*

- Are you considering a home addition or spring projects?
- College Tuition?
- Debt consolidation?

NOW is a good time to lock in low interest rates!
Shorten your loan term to 15-25 years to save thousands of dollars over the life of the loan while keeping your payment under control.

*Let me give you a FREE mortgage analysis; it may be worth it!*

*Mealea Chan~Polcari*
Cell: (978) 996-9296
E-mealeac@firsteastern.com
NMLS#761776

Speaks Khmer / Cambodian

NMLS#616522
Member FDIC
First Eastern Mortgage
A Division of FIRST FEDERAL SAVINGS BANK of Boston
FFSB Since 1923
Subject to credit approval

តមកពីទំព័រទី ១

## បុណ្យចូលឆ្នាំខ្មែរនៅឡូវែល...

រយៈពេលបីថ្ងៃនៃបុណ្យចូលឆ្នាំជាថ្ងៃដែលពិសេសក្នុងនោះប្រជាជនមានរៀបចំរណ្តាប់ទទួលទេវតាការធ្វើម្ហូបអាហារប្រគេនព្រះសង្ឃនៅឯវត្តការលេងល្បែងប្រជាប្រិយផ្សេងៗការស្រង់ព្រះ និង មាតាបិតា ការពូនភ្នំខ្សាច់ ។ល។

មិនថាតែក្នុងប្រទេសនៅនាយសមុទ្រ ដូចជាក្រុងឡូវែលសហរដ្ឋអាមេរិកប្រជាជនខ្មែរដែលរស់នៅទីនេះ ប្រកាន់ខ្ជាប់នូវការប្រារព្ធពិធីបុណ្យចូលឆ្នាំមិនលោះពេលឡើយ ។ បើនិយាយពីបុណ្យជាតិបុណ្យចូលឆ្នាំខ្មែរនៅអាមេរិក គឺពុំ





បានត្រូវរាប់ក្នុងប្រតិទិនជាតិ ដូចនេះហើយប្រជាជនខ្មែរនៅទីនេះក៏ពុំបានឈប់សម្រាកឱ្យពេញដៃពេញជើងដែរ ។ យ៉ាងណាមិញពួកគាត់គន់គូរពេលវេលា និងគិតត្រៀមទុកជាមុនជ្រើសរើសថ្ងៃល្អដែលប្រជាជន បានសម្រាកពីការងារ និងជ្រើសរើសទីតាំងសម្រាប់ប្រារព្ធបុណ្យនេះ ។



ល្បែងទាញព្រ័ត្រ

តួយ៉ាងវត្តក្នុងក្រុងឡូវែលបានចាប់ផ្តើមប្រារព្ធបុណ្យចូលឆ្នាំនៅថ្ងៃសៅរ៍ ទី១២ នៅតាមវត្តអារាមមានវត្តពន្លឺពុទ្ធចក្រវត្តត្រៃរតនារាម និងអារាមផ្សេងៗទៀត ។ ក្រៅពីកិច្ចសាសនានៅឯខ្លួមិន តេផាក ឬសួនប៉ៃលិនដែលខ្មែរនៅឡូវែលតែងចំណាំហៅនោះ ក៏មានរៀបចំប្រារព្ធពិធីបុណ្យនេះ តាមរយៈកម្មវិធីជាច្រើនដូចជាការប្រគុំតន្ត្រីសម័យការបង្ហាញរបាំជូនពររបាំត្រុដរបាំគោះត្រឡោក របាំគោះអង្រែការ បង្ហាញម៉ូដសម្លៀកបំពាក់តាមពណ៌នៃថ្ងៃទាំង៧ និងការលេងល្បែងប្រជាប្រិយ ដូចជាចោលឈូងទាញព្រ័ត្រដណ្តើមស្លឹកឈើ ។ល។

កម្មវិធីនាថ្ងៃនោះប្រព្រឹត្តទៅដោយមានអំណោយផលពីអាកាសធាតុមានពន្លឺថ្ងៃបើកបានល្អមានការសាទរ និងចូលរួមពីសំណាក់រដ្ឋបាល ដូចជាការមានប្រសាសន៍ខ្លីៗពីទីប្រឹក្សាក្រុងបៀលសាម៉ារ៉ាស់ អតីតទីប្រឹក្សាក្រុង រីទ្ធី អ៊ុង អតីតអភិបាលក្រុងផាទ្រិក មឺហ្វី និងភ្ញៀវសំខាន់ ជាច្រើនទៀត ។

ក្នុងកម្មវិធីឯសួនប៉ៃលិននាថ្ងៃនោះប្រព្រឹត្តទៅដោយជោគជ័យក្រោមការរៀបចំផ្តួចផ្តើមពីក្រុងខ្មែរដែលមានបណ្ឌិត សេងលី គង់ ជា ប្រធានលោកផល រដ្ឋាយ៉ែម និងសមាជិក ក៏ដូចជាអ្នកស្ម័គ្រចិត្តពិធីករ ឱក តុលាយុត្តិ និងពិធីការិនី សុបិន្តពិន ជួយយកអាសារញ៉ាំងឱ្យកម្មវិធីនេះ ផ្តល់ជាភាតរភាពក្នុងសហគមផងរំពឹកប្រពៃណីវប្បធម៌ខ្មែរផង និងបង្ហាញសាវតាខ្មែរដល់សាសន៍ដទៃទៀតបានជ្រាបផង ៕

តមកពីទំព័រទី ១

## បេក្ខជនតំណាងរដ្ឋធ្វើទស្សនកិច្ចក្នុង...

everyone with an opportunity to prosper is by providing the best education possible at every level, from pre-K through college. Coakley said the greatest economic asset of the Commonwealth is our skilled an educated workforce and we have to continue to strengthen that through improved education. She said she was proud of what she's done as Attorney General in holding big banks accountable for their shoddy practices during the foreclosure crisis and in challenging the Defense of Marriage Act nationally (it was in a case brought by Coakley's office that the US Supreme Court held DOMA unconstitutional). Finally, she stressed the importance of improving behavioral health and mental health treatment. Obtaining care for those types of conditions should be as available and as good as treatment for diabetes and heart disease.

**Leland Cheung,** candidate for Lt Governor and current Cambridge City Councilor, explained that he is the son of Chinese immigrants and that his family frequently visited China. The experience of his parents and his own exposure to China has made him appreciate the freedoms we have in America even more.



Leland Cheungលីឡែន ឈឹង ឈរឈ្មោះសម្រាប់តួនាទីអភិបាលរង្សរង

Cheung earned degrees from Stanford, Harvard and MIT and became a venture capitalist, but he said the lessons of his youth drove him to get involved in public service so he ran for and was elected to the Cambridge city council. There, he's been a bridge builder who seeks common solutions to problem. He said his experience as a local elected official is unique among the candidates for Lieutenant Governor; the state, he says, faces the same challenges as does Cambridge. He said our goal should be to make the innovation economy work for everyone, not just the venture capitalists.

**Barry Finegold,** candidate for Treasurer and current State Senator, explained that he grew up in a middle class family, that he worked multiple jobs to pay his way through college and law school and that while he was originally attracted to Washington and national politics, a mentor convinced him that the place to make a difference in people's lives is at the local level. Barry returned to



Barry Finegoldបារី ហ្វាញហ្គូល ឈរឈ្មោះសម្រាប់តួនាទីហិរញ្ញិក

his hometown of Andover, was elected selectman, then state representative, and then state senator. One of the issues he's vigorously promoted is financial literacy for students and for all citizens. He said greater financial literacy would have reduced the impact of the foreclosure crisis and will reduce the problems faced as our aging population reaches retirement age. As Treasurer, he would ensure that our pension funds reflect our values so he would divest from fossil fuel investments yet he wouldn't act restlessly because he understands the importance of a financially secure pension system. He also promised to have a state lottery that "works for and not against people."

**Michael Sullivan,** candidate for Middlesex District Attorney and current Middlesex Clerk of Courts, explained that his first job in the DA's office was in



Michael Sullivanម៉ៃខិល ស៊ូលីវែន ឈរឈ្មោះសម្រាប់តួនាទីមេធាវីប្រចាំខណ្ឌមីដលសិុក

Lowell. Here, he saw the affect a DA can have on crime and the community because "we're not going to jail our way out of our problems." He stressed that if he wins the race, **Continued to page 31**

# ជូនកាលបានលទ្ធផលផ្ទុយនឹងចំណង់ !


លឹម គិមយ៉ា

ចំណង់ដែលចង់បាន និងលទ្ធផលដែលផ្តល់មកជូនកាលផ្ទុយគ្នាស្រឡះដោយមិនបានគ្រោងទុកជាមុន ឬគិតមិនដល់ ។ ការរស់នៅជារាងរាល់ថ្ងៃ មូលហេតុអស់នេះ មានជាញឹកញប់ដោយយើងមិនច្បាស់ថាលទ្ធផលដែលយើងចង់បាននោះ គឺដូចបំណងយើងនោះទេ គង់តែកិច្ចការអស់នេះនៅក្រោមការត្រួតត្រារបស់យើង១០០ភាគ១០០ក៏ដោយ ។

ចុះបើកិច្ចការនោះនៅក្រោមការត្រួតត្រារបស់យើងតែមួយភាគ ឬក៏អត់សោះលទ្ធផលដែលយើងសង្ឃឹមថា នឹងបាននោះច្បាស់ជាមិនបាន ១០០ភាគ១០០ដែលយើងសង្ឃឹមនោះទេ ឬក៏ផ្ទុយទៅវិញ ។

ការដែលខ្ញុំលើកទស្សនៈនេះមកពិចារណាពីព្រោះស្ថានភាពនយោបាយនៅប្រទេសខ្មែរតាំងស្ទេញតាំងពីពេលបោះឆ្នោតរើសសភាអណ្តត្តិទី៥ កាលពីថ្ងៃទី ២៨ កក្កដា ២០១៣ មកម្ល៉េះ ។ ហើយការចរចារវាងគណបក្សទាំងពីរដែលមានតំណាងនៅរដ្ឋសភា គឺគណបក្សសង្គ្រោះជាតិ និងគណបក្សប្រជាជនកម្ពុជា ដូចជាមានល្បឿនយឺតដែលជាការព្រួយបារម្ភដល់ស្ថានភាពនយោបាយ និងសេដ្ឋកិច្ចនេះបើយើងតាំងខ្លួនជាអ្នកជាតិនិយម ។ តែចំពោះពួកលោភអំណាចគឺពួកគណបក្សប្រជាជនកម្ពុជាគេអត់ទៅឈឺក្បាលនឹងជីវភាពប្រទេស និងប្រជាពលរដ្ឋនោះទេ ។ គង់តែសហគមអន្តរជាតិគេប្រកាសការពារបូរណភាពទឹកដី និងនយោបាយខ្មែរយ៉ាងណាក៏ដោយក៏ពួកអស់នេះលើកប្រទេសខ្មែរឱ្យទៅយួនដោយយកលេសថាអរគុណគេដោយគេបានមកលើកបន្ទុបពួកខ្លួនឱ្យបានអំណាច ។ នេះបានជាមនុស្សថោក និងចោលម្សៀតហួសកំរិត ។

គណបក្សទាំងពីរបានជួបគ្នាជាច្រើនលើកដូចជាកាលពីទី១៦.០៩.២០១៣១៨.០២.២០១៤ ០៣.មិនា ១០.មិនា ១៧.មិនា ហើយចុងក្រោយនេះ ដោយគ្មានបានលទ្ធផល គឺទី២៤.មិនា ។

ការប្រជុំដែលគណបក្សទាំងពីរបានសំរេចព្រមព្រាងគ្នា គឺកាលពីថ្ងៃទី១៧.មិនា ២០១៤ ដោយព្រមបញ្ចូលក្នុងក្របខ័ណ្ឌកំណែទំរង់ការបោះឆ្នោតនូវប្រធានបទសរុបចំនួន១៤ ដូចនៅខាងក្រោមនេះ :

**១.** ការរៀបចំការចុះឈ្មោះអ្នកបោះឆ្នោត និងបញ្ជីឈ្មោះអ្នកបោះឆ្នោត ដើម្បីធានាសិទ្ធិបោះឆ្នោតរបស់ប្រជាពលរដ្ឋគ្រប់រូប

**២.**រៀបចំបង្កើតច្បាប់ស្តីពីហិរញ្ញវត្ថុរបស់គណបក្សនយោបាយ

**៣.**កំណែទំរង់ស្ថាប័នរៀបចំបោះឆ្នោត

**៤.**អព្យាក្រិត្យភាព និងសុចរិតភាពនៃអង្គការសង្គមស៊ីវិល

**៥.** ប្រព័ន្ធផ្សព្វផ្សាយ និងមធ្យោបាយផ្សព្វផ្សាយរបស់គណបក្សនយោបាយ

**៦.**យន្តការនៃការដោះស្រាយវិវាទ

**៧.**ការសង្កេតការណ៍បោះឆ្នោត

**៨.**អព្យាក្រិត្យភាពនៃមន្ត្រីរាជការ និងកងកំឡាំងប្រដាប់អាវុធ

**៩.** កាលបរិច្ឆេតនៃការបោះឆ្នោត

**១០.**បទបញ្ជា និងនីតិវិធីនៃការបោះឆ្នោត

**១១.**កែសំរួល និងពង្រឹងទោសបជ្ញញត្តិនៅក្នុងច្បាប់បោះឆ្នោត

**១២.** ការឃោសនាបោះឆ្នោត

**១៣.**ការបោះឆ្នោតមេភូមិ

**១៤.**ការស្ទង់មតិ ។

ត្រង់ចំណុចទី៤ គឺបានសេចក្តីថា ការសំរេចនេះគឺផ្ទុយនឹងសិទ្ធិសេរីភាពរបស់អង្គការសង្គមស៊ីវិល ដោយចោទថា គ្មានអព្យាក្រិត្យភាព និងសុចរិតភាព ។ ត្រង់កន្លែងនេះ យើងសង្ឃឹមថានឹងមានប្រតិកម្មពីអង្គការសង្គមស៊ីវិលទាំងអស់ ។

ការព្រមព្រាងអស់នេះគឺបានត្រឹមតែលើក្រដាសសិន ដោយប្រជុំកាលពីថ្ងៃទី២៤មិនា គណបក្សសង្គ្រោះជាតិ បានជូនយោបល់កំណែទំរង់ស្ថាប័នរៀបចំបោះឆ្នោត ចំណុចទី៣ ដោយស្នើឱ្យស្ថាប័នគ.ជ.បជាស្ថាប័នធម្មនុញ្ញ និងការជ្រើសរើសតាំងសមាសភាព គ.ជ.ប ត្រូវអនុម័តពីរភាគបីនៃសមាជិកសភាទាំងមូល ។ តែគណបក្សប្រជាជនកម្ពុជាមិនយល់ព្រមបានជាមានការផ្អាកការជួបគ្នារវាងគណបក្សទាំងពីរនេះមកតាំងពីថ្ងៃ២៤មិនា ។

លោកសមរង្ស៊ីបានថ្លែងនៅក្នុងសន្និសីទសារព័ត៌មាននៅរសៀលថ្ងៃទី១០មេសាថា នៅក្នុងជំនួប រវាងលោក និងលោក ហ៊ុន សែន តាមទូរស័ព្ទ កាលពីថ្ងៃទី៩មេសានោះមានផលជាវិជ្ជមានគឺលោកនិងលោក ហ៊ុន សែន បានយល់ព្រមកែទម្រង់ស្ថាប័នបោះឆ្នោតទី១ស្ថានប័នគ.ជ.ប នឹងក្លាយជាស្ថាប័នមួយថ្មីចេញពីកិច្ចព្រមព្រៀងនៃគណបក្សទាំងពីរនឹងមានចែងនៅក្នុងរដ្ឋធម្មនុញ្ញ។ ទី២កែទម្រង់ប្រព័ន្ធផ្សព្វផ្សាយ និងទី៣ការបោះឆ្នោតមុនអាណត្តិ ។

លោកសមរង្ស៊ីបញ្ជាក់ថា អ្វីដែលមិនទាន់ឯកភាពគ្នានោះគឺកាលបរិច្ឆេទការបោះឆ្នោត ។ លោក សម រង្ស៊ី ឱ្យដឹងថា លោក ហ៊ុន សែន ចង់ឱ្យការបោះឆ្នោតក្រុមប្រឹក្សាឃុំសង្កាត់បង្ហិតមកនៅខែកុម្ភៈ ឆ្នាំ២០១៧ និងចង់បោះឆ្នោតជាតិនៅ ខែកុម្ភៈ ឆ្នាំ២០១៨ តែគណបក្សសង្គ្រោះជាតិចង់បានការបោះឆ្នោតពាក់កណ្តាលអាណត្តិគឺនៅឆ្នាំ២០១៦ ។ ទោះជាយ៉ាងនេះក្តីលោក សម រង្ស៊ី លើកឡើងថា ចំណុចដែលមិនទាន់ឯកភាពគ្នានេះនៅប្រមាណ២០%ទេ ។ ម្យ៉ាងវិញទៀតការសម្រេចណាមួយរបស់គណបក្សសង្គ្រោះជាតិគឺទាល់តែមានការឯកភាពរបស់គណបក្សទាំងមូលពិសេសពីលោក កឹម សុខា ដែលកំពុងបំពេញបេសកកម្មនៅក្រៅប្រទេស ។

តាមលោក ហ៊ុន សែន មានប្រសាសន៍ថា ការពិភាក្សាតាមទូរស័ព្ទរវាងរូបលោក និងលោក សម រង្ស៊ី ប្រធានគណបក្សសង្គ្រោះជាតិទាក់ទិនបញ្ហាជាប់គាំងនយោបាយបានឯកភាពគ្នាលើចំណុចជាច្រើនមានដូចជាបានព្រមព្រៀងកំណត់កាលបរិច្ឆេទបោះឆ្នោតក្រុមប្រឹក្សាឃុំ-សង្កាត់អាណត្តិទី៤នៅខែកុម្ភៈឆ្នាំ២០១៧ និងបោះឆ្នោតសភានីតិកាលទី៦នៅខែកុម្ភៈឆ្នាំ២០១៨ជាដើម ។ ត្រង់នេះដូចជាមិនពិតបើតាមសន្និសីទសារព័ត៌មានរបស់លោក សម រង្ស៊ី ។

ហ៊ុន សែន ថ្លែងបន្តថា កិច្ចពិភាក្សាតាមទូរស័ព្ទអាចនិយាយថា បានត្រូវដងត្រូវផ្លែគ្នាអស់ហើយហើយបើបែរជាមានឧបសគ្គគឺមិនមែនរូបលោក ហ៊ុន សែន ឬ សម រង្ស៊ី នោះទេ គឺបញ្ហាស្ថិតនៅលើរូបលោក កឹម សុខា អនុប្រធានគណបក្សសង្គ្រោះជាតិឯណោះវិញទេ ។

ជាងនេះ ហ៊ុន សែន ក៏បានលើកឡើងពីលទ្ធភាពរបស់គណបក្សប្រជាជនកម្ពុជាក្នុងការកែសម្រួលគណៈកម្មាធិការជាតិរៀបចំការបោះឆ្នោត(គ.ជ.ប) និងបានព្រមានបញ្ចេញខ្សែអាត់នៃកិច្ចពិភាក្សារវាងរូបលោកជាមួយលោក សម រង្ស៊ី ថែមទៀតបើលោក សម រង្ស៊ី មិនទទួលស្គាល់កិច្ចសន្ទនារបស់លោក ។

**លោក ហ៊ុន សែន :** បើសិនជារឿងមិនអាចចុះហត្ថលេខាបានមិនមែនជាកំហុស ហ៊ុន សែន ឬគណបក្សប្រជាជនកម្ពុជាហើយក៏មិនមែនជាកំហុស សម រង្ស៊ី និងក្រុមការងាររបស់ឯកឧត្តមសមរង្ស៊ី គឺជាកំហុសរបស់ឯកឧត្តម កឹម សុខា ហើយសូមកុំធ្វើសេចក្តីថ្លែងការណ៍ណាមួយខុសរឿងខុសរ៉ាវខុសសម្តីដែលជជែកគ្នាព្រោះខាងណោះក៏បានថតសំឡេងដែរ ។ព្រោះសំឡេងថតខាងនោះប្រហែលជាមិនសូវស្រួលព្រោះធម្មតាទេខ្ញុំធ្វើមេចារកម្មតាំងពីអាយុ១៩ឆ្នាំហើយធ្វើការត្រូវមានឯកសារ ។អ៊ីចឹងសុំមេត្តាកុំឱ្យនិយាយអីខុសពីអ្វីដែលយើងបានព្រមព្រៀងគ្នានិងបានឯកភាពគ្នាហើយ ។ប៉ុន្តែយើងយល់ការលំបាកដោយសារតែគណបក្សសង្គ្រោះជាតិហ្នឹងទើបមានអាយុត្រឹម១ឆ្នាំ ។

នេះបង្ហាញពីចរិករបស់ហ៊ុនសែនដែលរាជរដ្ឋាភិបាលរបស់វាធ្វើការមិនសូវមានឯកសារទេ គឺពួកវាខ្លាចតម្លាភាពណាស់ គឺចរិកពួកកុម្មុយនីស្ត ។

លោក ហ៊ុន សែន បញ្ជាក់ថា បើមានការឯកភាពគ្នាលើបញ្ហាដូចដែលរូបលោក និងលោក សម រង្ស៊ី បានព្រមព្រៀងតាមទូរស័ព្ទ គឺគណបក្សទាំងពីរមានគម្រោងចុះហត្ថលេខានៅថ្ងៃសុក្រ ទី១១ ខែមេសានៅព្រះបរមរាជវាំងក្រោមព្រះរាជអធិបតីភាពរបស់ព្រះមហាក្សត្រ ។ ប៉ុន្តែបើបែរជាត្រូវបានអាក់ខានទៅវិញ គឺរូបលោក កឹម សុខា ជារនាំង ។

លោក ហ៊ុន សែន ដឹងដែលថា លោក កឹម សុខា នៅអាមេរិកនឹងមិនអាចត្រឡប់មកវិញឱ្យទាន់ពេលនោះទេ ។ យើងអាចចោទសួរបើចុះហត្ថលេខានៅក្រោយថ្ងៃសុក្រ ទី១១ ខែមេសា នៅព្រះបរមរាជវាំងក្រោមព្រះរាជអធិបតីភាពរបស់ព្រះមហាក្សត្រនោះតើវាមានទំនាស់អ្វី ឬមួយខុសថ្ងៃខែហុងស៊ុយរបស់ ហ៊ុន សែន? ប៉ុន្តែក្រោយមកការជំនួបអស់នេះក៏ស្ងាត់បាត់ឱ្យឈឹងហើយម្នាក់ៗមានដំណើរទៅបរទេស ។

គណបក្សសង្គ្រោះជាតិបានជូនយោបល់ជ្រើសរើស គជប គឺពឹងផ្អែកទៅលើគំនិតអង្គការសង្គមស៊ីវិល និងអនុសាសន៍របស់អង្គការអន្តរជាតិខ្លះ ដែលមិនស្គាល់ច្បាស់ពីស្ថានភាពនយោបាយខ្មែរចិត្តគំនិតរបស់ខ្មែរ គឺគ្រាន់តែសំអាងទៅលើទ្រឹស្តីមួយស្ថិតនៅលើច្បាប់ និងសីលធម៌ដែលក្រុមដឹកនាំគណបក្សប្រជាជនកម្ពុជា ជាពិសេសមេវា គឺយួនអត់ទៅឈឺក្បាលបន្តិចសោះពីរឿងនេះ ដែលពួកវារំលោភគ្រប់ពេលវេលាលើកិច្ចសន្យាអន្តរជាតិគ្រប់បែបយ៉ាង ។

ហេតុយ៉ាងនេះ ដើម្បីកុំឱ្យខកចិត្តដល់យើង និងប្រជាពលរដ្ឋខ្មែរដែលគេផ្តល់សេចក្តីសង្ឃឹមមកលើគណបក្សសង្គ្រោះជាតិយើងសង្ឃឹមថា គណបក្សសង្គ្រោះជាតិ គិតយ៉ាងដូចម្តេចនឹងអាចត្រួតពិនិត្យមើលគ្រប់ពេលវេលាពីភាពអព្យាក្រិត្យ និងឯករាជភាពរបស់សមាជិក គ.ជ.ប ដែលយើងមានឧទាហរណ៍រួចមកហើយ ដែលគណបក្ស សម រង្ស៊ី បានបញ្ជូនអ្នកតំណាងទៅ ហើយបែរជាទៅគាំទ្រប្រយោជន៍គណបក្សប្រជាជនទៅវិញ ដោយមូលហេតុផ្សេងៗគង់តែពួកអស់នេះជ្រើសរើសយ៉ាងដូចម្តេចក៏ដោយតែគេចេញពីគណបក្សសមរង្ស៊ី ។

ហើយចំណុចផ្សេងៗទៀតដែលសំរេចយើងក៏សង្ឃឹមថាគណបក្សសង្គ្រោះជាតិមានគំនិតធ្វើយ៉ាងដូចម្តេចឱ្យបានលទ្ធផលដូចព្រាងទុក គឺមិនត្រឹមតែថាចង់បាន ហើយលទ្ធផលហុចឱ្យនឹងផ្ទុយទៅវិញ ។

**លិម គិមយ៉ា**

**បេក្ខជនតំណាងរាស្ត្រជាប់ឆ្នោតគណបក្សសង្គ្រោះជាតិនៅខេត្តកំពង់ធំ**

# ឌឹ ខេមបូឌា ដេលី The Cambodia Daily

ដំណឹងថ្មីៗប្រសើរបំផុតពីកាសែតខេមបូឌា អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌឹ ខេមបូឌា ដេលី ច្បាប់ចេញផ្សាយថ្ងៃ ពុធ ទី២៣ ខែមេសា ឆ្នាំ២០១៤

## សន្តិសុខខណ្ឌដូនពេញវាយអ្នកតវ៉ាឱ្យរបួស១០នាក់

By Khuon Narim | April 21, 2014

កម្លាំងសន្តិសុខខណ្ឌដូនពេញប្រមាណ៣០នាក់បានវាយតប់ក្រុមអ្នកគាំទ្រគណបក្សសង្គ្រោះជាតិ កាលពីព្រឹកថ្ងៃចន្ទនេះ នៅឯទីលានប្រជាធិបតេយ្យក្រុងភ្នំពេញ។

អ្នកគាំទ្រគណបក្សសង្គ្រោះជាតិម្នាក់បានទទួលរងរបួសដោយសារក្រុមសន្តិសុខវាយ។ Kevin Doyle

យ៉ាងហោចណាស់មានមនុស្សជាង១០នាក់បានទទួលរងរបួសស្រាល ហើយ៤នាក់ផ្សេងទៀតបានរងរបួសក្បាលហូរឈាមដោយសារក្រុមសន្តិសុខដែលពាក់មួកសុវត្ថិភាពបានប្រើដំបងវាយ និងទាត់ធាក់ក្រុមអ្នកតវ៉ាយ៉ាងដំណំខណៈដែលប៉ូលីសឈរមើល។

លោក សុក ពេញវុធ អភិបាលរងខណ្ឌដូនពេញបានបញ្ជាឱ្យក្រុមសន្តិសុខវាយអ្នកថតរូបណាដែលមិនកាន់កាតកាសែត។

លោក គីម វុត្ថា ប្រធានសន្តិសុខសណ្តាប់ធ្នាប់ និងលោក សុក ពេញវុធ បានស្រែកចង្អុលទៅលើក្រុមអ្នកថតរូបថា "វ៉ៃទៅ... វ៉ៃទៅ"។

អ្នកចូលរួមម្នាក់ឈ្មោះ ស្រី សាម៉ៃ អាយុ២៨ឆ្នាំ ត្រូវរងរបួសលើមុខដោយសារក្រុមសន្តិសុខវាយ។ គាត់បាននិយាយថា "ខ្ញុំមកទីនេះដើម្បីបញ្ចេញមតិ ហើយខ្ញុំមិនបានធ្វើអ្វីខុសនោះទេ សូម្បីតែកាម៉ារ៉ាក៏ខ្ញុំមិនមានផង។

ក្រុមសន្តិសុខខណ្ឌដូនពេញកំពុងចាប់បីលោកស្រី មូរ សុខហួរ តំណាងរាស្ត្រគណបក្សសង្គ្រោះជាតិនៅទីលានប្រជាធិបតេយ្យកាលពីព្រឹកមិញ។ Kevin Doyle

លោកស្រី មូរ សុខហួរ តំណាងរាស្ត្រគណ



បក្សសង្គ្រោះជាតិដែលជាអ្នកដឹកនាំការតវ៉ានៅទីលានប្រជាធិបតេយ្យដើម្បីទាមទារយុត្តិធម៌ឱ្យកម្មករដែលត្រូវកងកម្លាំងប្រដាប់អាវុធបាញ់សម្លាប់កាលពីដើមខែ មករា កន្លងមក បានមានប្រសាសន៍ថា "យើងមកទីនេះដើម្បីនិយាយអំពីកម្មករដែលត្រូវគេបាញ់សម្លាប់ និងរកយុត្តិធម៌ឱ្យពួកគេ។ រដ្ឋាភិបាលជាឃាតករ" ៕

## Security Guards Assault CNRP Supporters at Freedom Park

**By Khuon Narim | April 21, 2014**

A group of about 30 district security guards brutally assaulted a small contingent of CNRP supporters and onlookers on Monday morning near Phnom Penh's Freedom Park.

About 10 people sustained minor injuries and at least four people were bloodied with wounds to their head after the helmeted security force attacked the



crowd with batons and kicked them as municipal police looked on.

Sok Penhvuth, deputy Daun Penh district governor, ordered the attack, telling the security guards to beat anyone who was taking photographs without a press card.

Along with Kim Vutha, head of the district security force, Mr. Penhvuth pointed out offending photographers, shouting "fight them, fight them."

Mr. Vutha and City Hall spokesman Long Dimanche declined to comment when reached by telephone.

Srey Samai, 28, sustained wounds to the face during the security guards' unprompted assault.

"I came here for freedom of expression and did nothing wrong. I don't even have a camera," he said.

The attack came after CNRP lawmaker-elect Mu Sochua led a one-woman protest inside Freedom Park, calling for justice for garment factory workers who were killed by military police in early January.

"We come here to talk about the garment workers who have been killed and to find justice for them. The government is the killer," she said after entering a southern corner of the park.

Ms. Sochua has previously attempted to enter Freedom Park five times over the past two weeks-only to be blocked by security guards and police-in a campaign to spotlight the government's arbitrary enforcement of a ban on public protests.

She was eventually carried out of the park yesterday morning by security guards.

Reached by telephone, Ms. Sochua said that her success in making it into the park to deliver a speech was worth the trouble.

"[It was] totally worth it," she said. "It is the truth and the power of one that really scares them."

## សាកលវិទ្យាល័យនៅក្នុងប្រទេសកម្ពុជាទទួលបានរង្វាន់សម្រាប់ស្នាដៃផលិតមនុស្សយន្តពន្លត់អគ្គិភ័យ

**By Hay Pisey | April 21, 2014**

នាយកដ្ឋានអគ្គិភ័យរបស់ប្រទេសកម្ពុជាដែលរងការរិះគន់យ៉ាងច្រើននោះ ប្រហែលជាមានដំណោះស្រាយផ្នែកបច្ចេកវិទ្យាជាន់ខ្ពស់ក្នុងពេលអនាគត សម្រាប់ដោះស្រាយបញ្ហារបស់ខ្លួនបន្ទាប់ពីអ្នកវិទ្យាសាស្ត្រវ័យក្មេងមួយក្រុមមកពីសាកលវិទ្យាល័យន័រតុនបានចូលរួមក្នុងកម្មវិធីប្រកួតប្រជែងមនុស្សយន្តអន្តរជាតិម៉ាឡេស៊ីលើកទី៤ កាលពីសប្តាហ៍មុន និងបានជាប់ចំណាត់ថ្នាក់លេខ៣ក្នុងផ្នែកមនុស្សយន្តពន្លត់អគ្គិភ័យ។

ព្រឹត្តិការណ៍ប្រចាំនេះត្រូវបានប្រារព្ធនៅសាកលវិទ្យាល័យ Universiti Malaysia Perlis ពីថ្ងៃទី១១ដល់ថ្ងៃទី១៣ ខែមេសាឆ្នាំនេះ និងមានការចូលរួមប្រកួតប្រជែងពីសាកលវិទ្យាល័យចំនួន១៩មកពីទូទាំងពិភពលោកដែលសិក្សាផ្នែកមនុស្សយន្តសម្រាប់ដោះស្រាយបញ្ហាជាក់ស្តែងនៅក្នុងសង្គម។

កម្មវិធីប្រកួតប្រជែងមនុស្សយន្តពន្លត់អគ្គិភ័យគឺជាកម្មវិធីដ៏ គួរឱ្យចាប់អារម្មណ៍ក្នុងកម្មវិធីប្រកួតប្រជែងជាច្រើន ហើយសាកលវិទ្យាល័យន័រតុនមានពីរក្រុមក្នុងចំណោមបីក្រុមដែលប្រកួតប្រជែងគ្នានៅក្នុងវគ្គជម្រុះ។ មនុស្សយន្តទាំងនេះត្រូវបានបង្កើតឡើង ដើម្បីដាក់ឱ្យធ្វើសកម្មភាពនៅក្នុងលំនៅដ្ឋានមានអគ្គិភ័យក្នុងគោលបំណងជួយសង្គ្រោះជនរងគ្រោះ (បាល់ប៉េងប៉ុង) និងពន្លត់អគ្គិភ័យ (ទៀន) ក្នុងរយៈពេលបីនាទី។

អ្នកប្រកួតប្រជែងមួយក្រុមមកពីសាកលវិទ្យាល័យន័រតុនបានដកខ្លួនចេញពីការប្រកួតនៅដើមកម្មវិធី ប៉ុន្តែរង់ចាំមើលក្រុមរួមជាតិមួយទៀតឆ្លងកាត់វគ្គប្រកួតប្រជែងដ៏ស្វិតស្វាញឆ្ពោះទៅរកវគ្គពាក់កណ្តាលផ្តាច់ព្រ័ត្រមុនពេលក្តីសង្ឃឹមថាឈ្នះរបស់ក្រុមនេះត្រូវរលាយ។ ទោះជាទទួលជោគជ័យបែបនេះក៏ដោយ ក៏ប្រហែលជាត្រូវការពេលវេលាជាច្រើនឆ្នាំ មុនពេលមនុស្សយន្តអាចធ្វើការងារពន្លត់អគ្គិភ័យជំនួសមនុស្សនៅក្នុងប្រទេសកម្ពុជាបាន។

លោក ឡាយ រមនា អ្នកសម្របសម្រួលផ្នែកស្រាវជ្រាវនៅក្នុងមហាវិទ្យាល័យវិទ្យាសាស្ត្រនៃសាកលវិទ្យាល័យន័រតុន និងជាប្រធានក្រុមដែលទទួលបានរង្វាន់ក្នុងកម្មវិធីប្រកួតប្រជែងនេះ បានមានប្រសាសន៍ថា "មនុស្សយន្តពីរដែល

តទៅទំព័រទី ១៤

## Cambodian University Wins Prize for Firefighting Robots

**By Hay Pisey | April 21, 2014**

Cambodia's beleaguered fire department may have a future high-tech solution to its problems after a team of young scientists from Norton University competing



in the 4th Malaysian International Robot Competitions (MIRoC) last week placed third in the Fire Fighting Robot category.

The annual event, held this year from April 11 to 13 at Universiti Malaysia Perlis, involved robotics teams from 19 universities around the world.

Robots built by students at Norton University's College of Science are displayed at the 4th Malaysian International Robot Competitions in Perlis, Malaysia. (Lay Romnea)

The Fire Fighting Robot was the main event among various competitions. The robots were designed to move around an imitation house, rescuing as many "victims" (ping-pong balls) and extinguishing as many "fires" (candles) as possible within three minutes.

The Norton team's robot navigated a fiery path to the semifinal before their hopes of winning were finally extinguished. But despite the success, it may be some years before robots replace Cambodia's human firefighters.

"The two robots we took to compete in Malaysia were very simple, small robots weighing only 1.5 kg and measuring only 250 millimeters in height and 130 millimeters across," said Lay Romnea, coordinator of research at Norton's college of science and leader of the prize-winning team.

Each robot was equipped with a suction motor to collect the ping-pong balls in its path and a small helicopter-like fan on top to extinguish the candles placed along the side of the corridors, he said.

ខេមបូឌា ដេលី The Cambodia Daily

ដំណឹងថ្មីៗសំរួលពីភាសាអង់គ្លេស អត្ថបទដកស្រង់ និងបកប្រែ ... ខេមបូឌា ដេលី ... ថ្ងៃ ពុធ ទី២៣ ខែមេសា ឆ្នាំ២០១៤

## អាជ្ញាធរនាំខ្លួនអ្នកតវ៉ាឡើងតុលាការ ប៉ុន្តែមិនមានការរកយុត្តិធម៌សម្រាប់អ្នកស្លាប់ទេ

By Mech Dara and Alex Willemyns | April 24, 2014

ភូមិសម្បូរមាស, ខេត្តកំពង់ស្ពឺ- នៅពេលដែលកងរាជអាវុធហត្ថប្រដាប់ដោយកាំភ្លើងអាកា-៤៧បានបង្ក្រាបកម្មកររោងចក្រកាត់ដេរដែលធ្វើកូដកម្មទូទាំងប្រទេសកាលពីថ្ងៃទី៣ ខែមករា នោះ សម រ៉ាវី អ្នកគ្រប់គ្រងម្នាក់នៅរោងចក្រមួយនៅតាមផ្លូវវេងស្រេងកំពុងនិយាយតាមទូរស័ព្ទជាមួយម្តាយក្មេករបស់គាត់។ អ្នកគាំទ្រ និងសាច់ញាតិរបស់អ្នកជាប់ឃុំទាំង២១នាក់កំពុងអុចធូបនៅមុខពន្ធនាគារព្រៃស កាលពីម្សិលមិញ។ ស៊ីវ ចាន់ណា.



សម រ៉ាវី ដែលចេះនិយាយភាសាចិន និងភាសាអង់គ្លេស ព្រមទាំងភាសាខ្មែរនោះមានប្រាក់ខែស្មើនឹងពីរដងនៃប្រាក់ខែគោល១៦០ដុល្លារ ដែលកម្មករកំពុងទាមទារ ប៉ុន្តែគាត់បានចូលរួមការតវ៉ានេះនៅក្នុងខណ្ឌពោធិ៍សែនជ័យដើម្បីបង្ហាញពីសាមគ្គីភាពជាមួយកម្មកររបស់គាត់ ។

ម្តាយក្មេករបស់គាត់ឈ្មោះ ឡុង សារ៉ន បានរៀបរាប់កាលពីម្សិលមិញថា "គាត់បានទូរស័ព្ទមក និងនិយាយថា អាឡូម៉ែ តើប្រពន្ធខ្ញុំកំពុងធ្វើដំណើរមកភ្នំពេញជាមួយកូនខ្ញុំឬ? ខ្ញុំបានឮស្នូរកាំភ្លើង ហើយខ្ញុំបានសួរគាត់ថាតើកូននៅឯណា"។ អ្នកស្រីបាននិយាយថា សម រ៉ាវី បានប្រាប់គាត់

តទៅទំព័រទី១៧

## As Protesters Prepare for Court, No Justice for Dead

By Mech Dara and Alex Willemyns | April 24, 2014

SAMBO MEAS VILLAGE, Kompong Speu province - As military police with AK-47s descended on protesting garment workers during their nationwide strike on January 3, Sam Ravy, a manager at one of the many factories along Phnom Penh's Veng Sreng Street, was on the phone with his mother-in-law.

Sam Ravy, who spoke Chinese and English as well as Khmer, earned double the $160 basic monthly salary being demanded by the strikers, but he attended the protest in Pur Senchey district to show solidarity with his workers.

A supporter lights incense Wednesday in front of Prey Sar prison in Phnom Penh, where 21 garment workers and labor activists were transferred ahead of their trials on Friday. (Siv Channa)

"He had called and said 'Hello mother, is my wife on the way to Phnom Penh with our child?' I heard the sound of shooting, and I asked him where he was," his mother-in-law, Long Saran, recalled Wednesday. She said Sam Ravy had dismissed her concerns in their morning phone call.

"He told me he was with the other protesters. Then his phone went quiet…. At 2 p.m. someone called us and told us to pick up the body," she said.

Sam Ravy, 25, was one of at least five protesters killed by the military police's AK-47 fire during the successful effort to put down the nationwide strike, which had dovetailed with mass protests by the political opposition.

**Continued to page 24**

## មហោស្រពសម្តែងម៉ែរីម៉ាក់ត្រូវការតួសម្តែងមកលេងក្នុងរឿងខ្មែរអាមេរិកាំង ឆ្នាំសូន្យត្រូវការតួសម្តែងចំនួនបួន

ក្រុងឡូវែលរដ្ឋម៉ាសាឈូសេត-មហោស្រពសម្តែងម៉ែរីម៉ាក់ (អឹម អរ ធី) ជាក្រុមហ៊ុនមហោស្រពសម្តែងផ្លូវការមួយនៅក្នុងក្រុងឡូវែលនៃរដ្ឋម៉ាសាឈូសេត។ យើងខ្ញុំកំពុងស្វែងរកតួសម្តែងដែលមានបទពិសោធន៍ដោយផ្ញើនូវរូបថតចំពីមុខ និងជីវប្រវត្តិមកយើងខ្ញុំដើម្បីដើរតួក្នុងរឿង "ឆ្នាំសូន្យ"។ ល្ខោនមួយនេះនិពន្ធដោយម៉ៃឃើល ហ្គូឡាំខូ។ តួសំខាន់ក្នុងល្ខោនមួយនេះ គឺ វុទ្ធី ដែលជាយុវជនខ្មែរអាមេរិកាំងបានឆ្លងកាត់ឧបសគ្គស្វែងរកអត្តសញ្ញាណរបស់លោកក្នុងសហគមន៍ដែលលោករស់នៅ និងក្នុងគ្រួសារមួយដែលទំនងជានឹងត្រូវបាត់បង់។ ល្ខោនមួយនេះក៏ជាល្ខោនកំប្លែងស្តីពីការស្វែងទិសដៅ និងផ្ទះ។ "ឆ្នាំសូន្យ" ជាសាច់រឿងដែលបានកើតឡើងនៅឡុងប៊ិចនៃរដ្ឋកាលីហ្វរនីញ៉ា ឆ្នាំ២០០៣។

ល្ខោនមួយនេះ នឹងក្លាយជាល្ខោនប្រចាំរដូវកាលរបស់ក្រុមហ៊ុនមហោស្រពសម្តែងម៉ែរីម៉ាក់សម្រាប់ឆ្នាំ២០១៤-២០១៥។ ការហាត់សមនឹងចាប់ផ្តើមនៅថ្ងៃទី១៩ ខែសីហា បន្តរហូតដល់ស្របពេលនឹងការសម្តែងដែលនឹងប្រព្រឹត្តទៅនៅថ្ងៃទី១១ ខែកញ្ញា ដល់ថ្ងៃទី៥ ខែតុលាឆ្នាំ២០១៤។ តួសម្តែងត្រូវតែផ្តល់ពេលវេលា និងវត្តមានរបស់ខ្លួនទាំងថ្ងៃទាំងយប់សម្រាប់រយៈពេល៧សប្តាហ៍នៃការហាត់សម និងអំឡុងពេលសម្តែង។ រាល់ការដើរតួទាំងអស់ជាតួទទួលបានប្រាក់ខែ ហើយការផ្តល់ជូនទីកន្លែងស្នាក់នៅនឹងផ្តល់ដល់តួសម្តែងកិត្តិយស។

តួទាំងបួននៅក្នុងល្ខោនមួយនេះ បច្ចុប្បន្នពុំទាន់មាននរណាជាម្ចាស់នៅឡើយ។ តួសម្តែងក្នុងល្ខោន "ឆ្នាំសូន្យ" នេះ អាចនឹងត្រូវប្រើឃ្លាភាសាខ្មែរ ពីរ ទៅ បី ប្រយោគ ក្រៅពីនោះ គឺជាភាសាអង់គ្លេសអាមេរិកាំង។ យ៉ាងណាមិញ សមត្ថភាពនិយាយខ្មែរមិនចាំបាច់ទេ។

វុទ្ធី-អាយុ១៦ឆ្នាំ ជាបុរសខ្មែរអាមេរិកាំង។ គេពាក់វ៉ែនតាជាយុវជនចង់មានឯករាជ្យម្ចាស់ការលើខ្លួនឯង ហើយរារែកក្នុងចិត្តរវាងជម្រើសជាក្មេងតាមផ្លូវ ឬត្រូវទៅរកអនាគតដែលប្រសើរ។ របៀបស្នៀកពាក់របស់គេ គឺអាវរលុងៗរបៀបអ្នកចម្រៀងរ៉ាប។

តទៅទំព័រទី ១៥

## MERRIMACK REPERTORY THEATRE SEEKS ACTORS FOR PLAY ABOUT THE CAMBODIAN-AMERICAN EXPERIENCE
### Roles for four actors available

Lowell, MA - Merrimack Repertory Theatre (MRT), a professional theatre company in Lowell, Massachusetts, is seeking actors with theatre experience to submit headshots and resumes for its production of Year Zero, a play by Michael Golamco. The play's central character is Vuthy – a Cambodian-American teenager struggling to find his place in a community that doesn't truly accept him and in a family that seems to be disappearing. A comedic drama about finding a direction and a home, Year Zero is set in Long Beach, California in 2003.

The play will open the company's 2014-2015 season. Rehearsals will begin on August 19 with performances running September 11 – October 5, 2014. Actors will need to be fully-available days and nights for the seven week rehearsal and performance period. All roles are salaried positions and complimentary housing is provided for guest actors.

All four of the roles in the play are currently available. The characters in Year Zero use a few Khmer phrases, but otherwise speak American-English. Ability to speak Khmer is not necessary.

VUTHY – 16 year-old Cambodian-American male. A glasses-wearing, self-described intellectual "geek" (he plays "Dungeons and Dragons") who, like any teenager, yearns for independence and is torn between dreams of being street-tough and following a better path. He beatboxes and freestyle raps.

RA – 22 year-old Cambodian-American female; Vuthy's older sister. Attractive, confident, level-headed college student at Berkeley. Although her current boyfriend Glenn is a sensible choice, she is still attracted to her ex-boyfriend Han's raw charisma and strength.

HAN–mid 20s– Cambodian-American male; Born in Cambodia of Cambodian parents, but came to the U.S. as an infant. Handsome, charming and charismatic, with street smarts and prison experience. He is good-hearted by nature, but has had to

**Continued to page 17**

girls inc.®

# កម្មវិធីរដូវក្តៅ

## ថ្ងៃទី ២៣ ខែមិថុនា ដល់ថ្ងៃទី២៥ ខែសីហា

**ថ្ងៃចាប់ផ្តើមផ្អែកលើថ្ងៃចុងក្រោយដែលសិស្សរៀននៅសាលារដ្ឋ**

ថ្ងៃច័ន្ទ-សុក្រ ម៉ោង ៨:៣០ព្រឹកដល់៥:០០ល្ងាច យកកូនមកលឿនសម្រាប់ម៉ោង៧:៣០ព្រឹក, ៨:៣០ព្រឹក
ក្មេងស្រីអាយុ៥-១៨ឆ្នាំ អង្កេត - សិក្សា និងរីកចំរើន
វត្ថុសិល្បៈ និងរបស់ធ្វើដោយដៃ - បន្ទប់ហាត់ប្រាណ និងកីឡា - ល្បែងកំសាន្ត - អាងហែលទឹក - គំនិតបង្កើតថ្មី និងសម្តែងសិល្បៈ,
វិទ្យាសាស្ត្រ - កុំព្យូទ័រ - ការចំអិន - ការអាន និង អក្សរសាស្ត្រ - ដំណើរកំសាន្ត និងច្រើនទៀត ។



**ព័ត៌មានបន្ថែមសូមទាក់ទង**

អាស័យដ្ឋាន : 220 Worthen Street , Lowell , MA 01852
លេខទូរស័ព្ទ : 978-458-6529
គេហទំព័រ : www.girlsinlowell.org




## Etsogo Sushi & Asian Cuisine

16 Merrimack Street
Lowell, MA 01852
Tel: 978-323-7878
Business Hours: Mon-Thur: 11:00AM to 10:00PM
**Fri-Sat: 11:00AM to 11:00PM**
**Sunday: 12:00PM to 10:00PM**

Lunch Special 11:00am to 3:30PM
(Monday thru Saturday only)

# ភោជនីយដ្ឋាន សុភមង្គលថ្មី

New Happiness Restaurant
Open from 7:30AM-9:00PM






**ទើបបើកថ្មីនៅឡូវែល**
**ម្ចាស់ថ្មី, ហាងខ្មែរ, ម្ហូបខ្មែរពិត។**

**ម្ហូបដែលភ្ញៀវតែងចូលចិត្តពិសារ**

- សេវាល្អ
- តម្លៃសមរម្យ
- កន្លែងចតឡានមុខក្រោយ



**ជ្រើសរើសបុគ្គលិកផ្នែកម្ហូប**

អាស័យដ្ឋាន: 6 Branch Street Lowell. MA 01851
ទូរស័ព្ទ : (978) 454-4727


តមកពីទំព័រទី ១២ សាកលវិទ្យាល័យនៅក្នុង...

យើងខ្ញុំបានយកទៅប្រកួតប្រជែងនៅក្នុងប្រទេសម៉ាឡេស៊ី? មានលក្ខណៈសាមញ្ញណាស់? ហើយមនុស្សយន្តតូចៗមានទម្ងន់ត្រឹមតែ១គីឡូកន្លះប៉ុណ្ណោះ ហើយមានកម្ពស់ប្រវែងតែ២៥០មិល្លីម៉ែត្រ និងទទឹងប្រវែង១៣០មិល្លីម៉ែត្រប៉ុណ្ណោះ"។

លោកបានឱ្យដឹងទៀតថា មនុស្សយន្តនីមួយៗត្រូវបានបំពាក់ដោយម៉ូទ័រស្រូបខ្យល់សម្រាប់ប្រមូលបាល់ប៉េងប៉ុងក្នុងស្ថានភាពចរាចរណ៍របស់វា និងមានកង្ហារតូចមួយដូចស្លាបឧទ្ធម្ភាគចក្រនៅផ្នែកខាងលើសម្រាប់ពន្លត់ទៀនដែលត្រូវបានដាក់នៅតាមផ្លូវខ្វាត់ខ្វែង។ លោក ឡាយ រមនា បានមានប្រសាសន៍ថា "យើងទទួលបានរង្វាន់ជាប្រាក់ប្រហែលជា៥០០ដុល្លារ សម្រាប់ចំណាត់ថ្នាក់លេខ៣ ហើយយើងយកប្រាក់ទាំងនោះមកចែកគ្នានៅក្នុងក្រុម ៕ **សុធា**

# តន្ត្រីក្រោមដី

**ដោយ : សុខា**

**បសស្តុន:** ជាទូទៅមនុស្សជាច្រើនប្រជ្រៀតគ្នាទិញសំបុត្រចូលទស្សនាការប្រគុំតន្ត្រីក្នុងសាលឬទីធ្លាធំៗផ្សេងៗ។ រឿងបែបនេះក៏មាននៅប្រទេសខ្មែរដែរ។ តែម្យ៉ាងដែលខ្មែរមិនមាន ហើយដែលអាមេរិក និងប្រទេសនៅអឺរ៉ុប និងមួយចំនួនទៀតមាន គឺតន្ត្រីក្រោមដី។

តាមបណ្តោយខ្សែនៃរថភ្លើងពណ៌ក្រហម ត្រង់ស្តុបផាកស្ទ្រីតតន្ត្រីករពីរនាក់អមដោយឧបករណ៍ភ្លេងលេងតន្ត្រីកងរំពងក្នុងសាប់វេយ ដែលជាទិដ្ឋភាពមួយគួរចាប់អារម្មណ៍។ សារ-ព័ត៌មានខ្មែរផុសឆ្លងកាត់ពីផាកស្ទ្រីតទៅហាវើដស្កែរ និងប្រទះនូវទិដ្ឋភាពនេះ ហើយក៏ចែករំលែកដល់ប្រិយមិត្តអ្នកអាន៕




តមកពីទំព័រទី ១៣ មហោស្រពសម្តែងម៉ារ៉ែម៉ាក់...

រ៉ា-អាយុ២២ឆ្នាំ ជានារីខ្មែរអាមេរិកាំង។ នាងជាបងស្រីរបស់ វុទ្ធី ។ នាងជានារីគួរឱ្យចាប់អារម្មណ៍ស្រស់ស្អាតមានទំនុកចិត្តលើខ្លួនឯង ហើយតម្រង់ការសិក្សាឱ្យដល់មហាវិទ្យាល័យនៅប៊ឺកខែលលី។ ទោះបី ហ្គិន ជាមិត្តប្រុសបច្ចុប្បន្នរបស់នាងហើយជាជម្រើសល្អគួរពិចារណាក៏ដោយ ក៏នាងនៅតែនឹកគិតដល់សង្សារចាស់របស់នាងដែលឈ្មោះហាន់។

ហាន់-អាយុពាក់កណ្តាលម្ភៃជាបុរសខ្មែរអាមេរិកាំងដែលកើតនៅស្រុកខ្មែរតែមកអាមេរិកក្នុងភាពជាកូនកំព្រា។ គេជាបុរសសង្ហាទាក់ទាញ ហើយក៏ឆ្លាត និងធ្លាប់មានបទពិសោធន៍ជាប់ពន្ធនាគារ។ គេជាបុរសមានបេះដូងល្អពីកំណើត តែគេពុះពាររបៀបរស់ដោយខ្លួនឯង។

ហ្គិន-អាយុពាក់កណ្តាលម្ភៃជាបុរសចិនកាត់អាមេរិក។ គេជាមនុស្សឆ្លាតមានការអប់រំល្អ រូបសម្បត្តិល្អគន់។ គេជាមនុស្សមានគំនិតអភិរក្ស តែក៏មិនស្មុគស្មាញពេកដែរ ពេលដែលមិនចាំបាច់។

រាល់បេក្ខជនចាប់អារម្មណ៍សូមផ្ញើពាក្យសុំដោយភ្ជាប់ជីវប្រវត្តិសង្ខេប និងរូបថតដែលមុខច្បាស់ដែលថតដោយកាម៉េរា ឬទូរស័ព្ទ ហើយសូមផ្ញើមកកាន់អ៊ីម៉ែល auditions@mrt.org ។ ពាក្យសុំអាចផ្ញើតាមប្រអប់សំបុត្រលេខ ៕



សាលាក្រុងឡូវែលលើកទង់ជាតិខ្មែរជាកិច្ចចូលរួមបុណ្យចូលឆ្នាំថ្មី ថ្ងៃទី ១៤ មេសា ឆ្នាំ២០១៤

តមកពីទំព័រទី ៧ ចៅក្រមកំពូល អាល់ប៊ី សាក់ស៊្ស...

កិច្ចពិភាក្សាស្តីពីសន្តិភាពនៅមជ្ឈមណ្ឌលសន្និសីទ អាយ ស៊ី ស៊ី ឡូវែល និងការរំឭកដល់ណែលសិនម៉ាន់ដេឡានៅមជ្ឈមណ្ឌលសុងហ្គាសសិនថឺ និងការអញ្ជើញទៅដោយផ្ទាល់ដល់ទីតាំងដែលសាលាយូម៉ាស់ឡូវែល និងបង្កើតជារូបសំណាក




ក្រុមនិស្សិត Peace & Conflict Studies នៃសកលវិទ្យាល័យយូម៉ាស់



ទីសម្ពោធរូបសំណាកណែលសិនម៉ាន់ដេឡា

អនុស្សាវរីយ៍រំឭកដល់ ណែលសិនម៉ាន់ដេឡា។ ចំណែកឯនាយកកម្មវិធី បណ្ឌិត ផៅឡា រេយម៉ែន (Pro. Paula Rayman, Ph.D) សាស្ត្រាចារ្យ និង និស្សិតនៃសាលាយូម៉ាស ក្នុងជំនាញទំនាស់ និងសន្តិភាព ឬជាភាសាអង់គ្លេស Peace and Conflict Studies បានចូលរួមយ៉ាងសកម្មក្នុងកម្មវិធីទាំងឡាយនាសប្តាហ៍ដែលអ្នកប្រាជ្ញសន្តិភាពទាំងបីរូបធ្វើបទបង្ហាញ ៕

ហាងមាសរស្មី
SUNSHINE JEWELRY, INC.
215-271-2950
Certified Diamonds & Golds (24K & 18K)
Men & Women Jewelries & Watches
Custom Design & Repairs on Premise
15 Years in Services & Growing Strong
702 Washington Ave. Phila., PA 19147
www.sunshinejewelryonline.com

# ១៣ឆ្នាំក្រោយ នៃគំនូរ "រដ្ឋាភិបាលសេដ្ឋកិច្ច" របស់វិចិត្រករ គីម ចាន់ថា

**Kim Chantha's Painting "Economic Government" 13 Years Later**

**ដោយ : សុខា**

**ក្រុងឡូវែល :** វិលត្រលប់ទៅឆ្នាំ ២០០១ នៅព្រះរាជាណាចក្រកម្ពុជាមានការប្រកួតប្រជែងជ្រើសរើសស្នាដៃគំនូររបស់វិចិត្រករខ្មែររៀបចំដោយគណៈកម្មការជ្រើសរើសពីក្រុងអូតាវ៉ា ប្រទេសកាណាដា។ លោក គីម ចាន់ថា ជាអតីតជ័យលាភីក្នុងការប្រកួតនោះ ដោយស្នាដៃដែលដាក់ប្រកួតជារូបគំនូរដែលលោកគូរ និងដាក់ចំណងជើងថា រដ្ឋាភិបាលសេដ្ឋកិច្ច។ ប៉ុន្តែមានបញ្ហាការពិភាក្សាសេចក្តីបកស្រាយ និងមតិជាច្រើនទាក់ទិន និងស្នាដៃខាងលើពីខាងរដ្ឋាភិបាលខ្មែររដ្ឋាភិបាលកាណាដា និងសាមីខ្លួន។ សារព័ត៌មានខ្មែរផុសសហរដ្ឋអាមេរិកបានជួបផ្ទាល់ជាមួយលោក គីម ចាន់ថា កាលពីដើមខែមិនានៅបន្ទប់គូរគំនូររបស់លោកក្នុងវេសស្ទីនស្ទឺឌីយ៉ូក្រុងឡូវែល។

ក្នុងបន្ទប់សិល្បៈដែលផ្ទុកទៅដោយស្នាដៃគំនូរជាច្រើនលោក គីម ចាន់ថា បានចាប់ផ្តើមហូតយកឯកសារថតចម្លងមួយច្បាប់ស្តីអំពីព័ត៌មានដែលបានចុះផ្សាយក្នុងសាពត៌មានដឺខេមបូឌាដេលីចេញផ្សាយកាលពីថ្ងៃសុក្រ ទី១៨ ខែឧសភា ឆ្នាំ២០០១ អំពីរឿងរ៉ាវទាក់ទិននឹងគំនូរដែលជាប់ជ័យលាភីនោះ។ ផ្អែកទៅលើសេចក្តីនៃព័ត៌មាន និងមតិសាមីខ្លួនដែលយើងបានសិក្សាស្វែងយល់បង្ហាញថា គំនូររបស់លោកដែលមានចំណងជើងថា រដ្ឋាភិបាលសេដ្ឋកិច្ចជាគំនូរបង្ហាញទិដ្ឋភាពស្ត្រីមេម៉ាយ និងកុមារទុរគតខ្វះជម្រក និងចំណីអាហារប្រៀបទៅនឹងទិដ្ឋភាពមួយចំហៀងទៀតនៃគំនូរដែលមានរថយន្តឡង់ត្រូស័រផ្លាកលេខរដ្ឋាភិបាល។ ស្រង់សម្តីរបស់ម្ចាស់ស្នាដៃគំនូរដែលជាប់ជ័យលាភីលោក គីម ចាន់ថា បានមានប្រសាសន៍ស្តីពីអត្ថន័យនៃគំនូរអំពីបំរៀបន័យឬមេតាផរអំពីភាពផ្ទុយគ្នានៃទ្រស្តី និងភាពជាក់ស្តែងដែលទ្រឹស្តីនៃការដឹកនាំបានថ្លែងថា "រាស្ត្រមានមុនរដ្ឋ" ក៏ប៉ុន្តែគំនូរដែលលោកបានគូរនោះបង្ហាញតថភាព"រដ្ឋមានមុនរាស្ត្រ"។ ខ្លឹមសារនេះមានការរសើបដល់សំណាក់រដ្ឋាភិបាលខ្មែរ ហើយលោក អៀងស៊ុ យន្តដាខាងក្រសួងវប្បធម៌នាកាលនោះ បានថ្លែងពីភាពមិនអាចទៅរួចដែលលោកគីមចាន់ ថា គួរទទួលបានជ័យលាភីឡើយ។ ជាលទ្ធផលគំនូររបស់លោកត្រូវបានរាជរដ្ឋាភិបាលខ្មែរច្រានចោល។ យ៉ាងណាមិញលោក គីម ចាន់ថា ត្រូវបានខាងក្រុងអូតាវ៉ាប្រទេសកាណាដានាំយករូបលោក និងស្នាដៃនោះមកប្រកួតនៅក្រុងអូតាវ៉ាប្រទេសកាណាដា ហើយលោក គីម ចាន់ថា ត្រូវបានកម្រិតចំពោះការដើរហើរពីឱកាសមកកាន់ប្រទេសខ្មែរវិញ។



វិចិត្រករ ចិន្តា គីម បង្ហាញផ្ទាំងគំនូរ"រដ្ឋាភិបាលសេដ្ឋកិច្ច"

ខ្សែជីវិតរបស់លោកក៏ត្រូវបានចំណាយក្នុងប្រទេសដទៃ ហើយបច្ចុប្បន្នលោករស់នៅក្នុងក្រុងឡូវែលសហរដ្ឋអាមេរិក និងនៅតែបន្តអាជីពជាជាងគំនូរ។

សាពត៌មានខ្មែរផុសសហរដ្ឋអាមេរិកនឹងធ្វើជាម្ចាស់ផ្ទះក្នុងការប្រារព្ធកម្មវិធីធំលើកទី៤នាថ្ងៃទី២ ខែឧសភា ឆ្នាំ២០១៤ខាងមុខនេះដើម្បីអបអរសាទររដូវកាលនៃប្រវត្តិសាស្ត្រអាស៊ីអាមេរិក។ កម្មវិធីនេះនឹងប្រព្រឹត្តទៅនៅភោជនីយដ្ឋានហុង កុង ចាប់ពីម៉ោង៦ល្ងាចដល់ម៉ោង១២អធ្រាត្រក្រោមអធិបតីភាពពីអតីតអគ្គរដ្ឋទូតអាមេរិកប្រចាំអង្គការសហប្រជាជាតិស៊ីចាន់ ស៊ីវ ភ្ញៀវនានាពីសំណាក់រដ្ឋាភិបាលក្រុងឡូវែល និងសហគន៍។ ក្នុងនោះនឹងមានការបង្ហាញការសម្តែងម៉ូដសម្លៀកបំពាក់នៃជាតិសាសន៍អាស៊ីការទទួលអាហារពេលល្ងាច៥មុខចម្រៀងរាំកំសាន្តនិងការដេញថ្លៃស្ទៀមស្វាត់លើផ្ទាំងគំនូររបស់វិចិត្រករ ចាន់ថា គីម ព្រមទាំងការដាក់តាំងនូវជ័យលាភីឆ្នាំ២០០១នោះ គឺគំនូររដ្ឋាភិបាលសេ-ដ្ឋកិច្ចក្នុងរាត្រីនៃហ្គាឡារបស់ខ្មែរផុសផងដែរ៕

តមកពីទំព័រទី ៦

## ក្រុមរបាំអង្គរអបអរសាទរសិល្បៈវប្បធម៌

ប្រដាក់គ្នាជាបន្តបន្ទាប់រួមមានរបាំគោះត្រឡោករបាំបុប្ផាលោកិយ របាំគោះអង្រែ របាំច្រូតស្រូវអមដោយការប្រគុំភ្លេងដោយក្រុមតន្ត្រីដែលមានលោកសាស្ត្រាចារ្យភ្លេងខ្មែរ សុវណ្ណ ខុន និងបណ្ឌិតអាឡិន វីល្យ៉ម (Alan William) ជាសហការីដឹកនាំនិស្សិតសាលាយូម៉ាសប្រគុំបទមហោរី និងវង់ភ្លេងខ្មែរ។

កម្មវិធីសម្តែងនារាត្រីនោះមានខ្មែរជាច្រើនព្រមទាំងបរទេសចូលរួមទស្សនាកុះករបំពេញកន្លែងអង្គុយតាំងពីដើមដល់ចុងកៅអីនៃសាល។

គួរបញ្ជាក់ផងដែរ ក្រុមរបាំអង្គរស្ថាបនាឡើងដោយលោក ធីម ធូ ជាប្រជាជនក្នុងសហគមឡូវែល ហើយដែលបានរក្សាចងក្រងតម្លៃនៃសិល្បៈរបាំខ្មែរបានបន្តទៅមុខរហូតមកដល់សព្វថ្ងៃ ក្នុងសហគមន៍នេះ។

សាច់រឿងនៃអប្សរាថ្មរាំនិយាយពីនិស្សិតខ្មែរអាមេរិកថ្នាក់ឧត្តមសិក្សាពីអាមេរិកផ្នែកបុរាណវិទ្យាដែលទទួលបានអាហារូបករណ៍ទៅស្រាវជ្រាវមុខជំនាញនេះ បានធ្វើដំណើរពីអាមេរិកទៅព្រះរាជាណាចក្រកម្ពុជាចុះចតនៅអាកាសយានដ្ឋានពោធិ៍ចិនតុង និងបន្តដំណើរទៅសៀមរាបរីករាយសប្បាយ ថតរូប និងទិញវត្ថុអនុស្សាវរីយ៍ប្រលែងលេងជាមួយពានរ។ ដល់ពេលត្រូវត្រឡប់ទៅសណ្ឋាគារពួកគេក៏ត្រឡប់ទៅវិញ លើកលែងតែខេមរាដែលមិនបានត្រឡប់ឡើយ ត្បិតគេលង់លក់ក្នុងទីដ៏ត្រសុំត្រសាយនៃដើមឈើ និងមានប្រាសាទបុរាណជាប់ដោយរូបអប្សរាស្រស់ស្អាត។ អំឡុងពេលខេមរាលង់លក់ក្នុងដំណេក





ខេមរាសុបិន្តឃើញអប្សរាថ្មទាំងនោះ មានជីវិតរស់រានឡើង ហើយតាំងរាំបញ្ចេញកាយវិការដំណើរល្វតល្វន់ដូចមនុស្សពិត មានឈុតស្នេហាឈុតសប្បាយថ្កុំថ្កើងឈុតកំសត់ដែលឈុតទាំងអស់នេះដាស់តឿនដល់ស្មារីខ្មែរជំនាន់ក្រោយឱ្យតាំងចិត្តរួបរួមសាមគ្គី ក្តាឡើងរក្សាទឹកដី កេរ្តិ៍ដំណែល ដែលដូនតា បានរក្សា និងបន្សល់ទុកឱ្យឱ្យបានថ្កុំថ្កើន និងស្ថិតស្ថេរ៕

Continued from page 06

## Angkor's stars shine with...

following a single overarching narrative structure. An original show by the troupe's artistic director, PhousitaHuy, Apsara Dancing Stonesmade its world premiere in 2012 at the Lowell Memorial Auditorium as the centerpiece of the troupe's 25th anniversary celebration. This year's presentationwas updated with new scenes and visual effects.

Apsara Dancing Stones was presented as part of UMass Lowell's daylong" Celebrate Cambodian Arts" Festival, a collaboration between the troupe and numerous UMass Lowell organizations including the Center for Arts and Ideas and Music Department. Daytime activities included poetry readings, a panel discussion, and a display of ceramist YaryLivan'sartwork. As part of the collaboration, Angkor Dance Troupe also hosted a workshop for UML students and performed several traditional dancesaccompanied by live music from UML's VongPleng Khmer ensemble.

The festival at UMass Lowell kicked off a busy April for Angkor Dance Troupe, whohave performed at numerous Cambodian New Year celebrations throughout the month. The troupe will also be featured at KhmerPostUSA's Annual Gala on May 3rd. Later this year,Angkor Dance Troupewill continue their commitment tothe preservation, education,and innovation of Cambodian performing arts with the debutof another new production during their weekend-long residency at the Merrimack Repertory Theatre in October.

"The collaborative event on April 3 was a perfect example of the rich fabric of Lowell's community. The performance accompanied by the live music of the Vong Pleng Ensemble provided enriched opportunities for our dancers to perform in front of a large cross section of our community "executive director Linda SopheapSou said, "The troupe is so proud of all our performers for another successful production. We look forward to our premiere performance at the MRT this fall."

## តមកពីទំព័រទី ១ គឹម សុខា- ហូវ៉ាន់ នៅឡូវែល

បានអនុមតិច្បាប់នានាជាឯកបក្សបំពានរដ្ឋធម្មនុញ្ញដែលជាបុព្វហេតុធ្វើឱ្យម្ចាស់ជំនួយកាត់បន្ថយថវិការផ្តល់មកឱ្យកម្ពុជាជាបន្តបន្ទាប់គ្នា ។ លោក គឹម សុខា សម្តែងការជឿជាក់យ៉ាងច្បាស់ជូនសមាជិករបស់លោកនារាត្រីនោះថា "តែមានបោះឆ្នោតគណបក្សសង្គ្រោះជាតិនឹងឈ្នះ បើបោះឆាប់ពេលណារឹតតែល្អពេលនោះ ពីព្រោះគណបក្សប្រជាជនអស់មានអ្នកគាំទ្រចេញមុខដូចមុនទៀត ហើយមេឃុំចៅសង្កាត់ ឥឡូវដើរឱនមុខអស់ហើយ!"។ លោកសម្តែងការកោតសរសើរយ៉ាងខ្លាំងចំពោះក្រុមបាតុករសង្គ្រោះជាតិដែលចេះតែកកើនរៀងរាល់លើកពីច្រើនពាន់ដល់ច្រើនម៉ឺន រហូតដល់លានអ្នកដោយសារការយល់ដឹងពីបញ្ហាជាតិយ៉ាងច្បាស់លាស់លោកបានលើកឧទាហរណ៍មួយថា "មានពេលធ្វើបាតុកម្មម្តងនោះខ្ញុំមានការព្រួយបារម្ភអំពីក្រែងមិនមានបាយទឹកគ្រប់គ្រាន់ជូនបាតុករដែលមកច្រើនជាងការប៉ាន់ស្មានប៉ាន់ថា មក ២ម៉ឺន ស្រាប់តែមក៤-៥ម៉ឺននាក់... ស្ត្រីម្នាក់ស្ទាទទឹកមុខខ្ញុំត្រូវបាននិយាយមកខ្ញុំថា ខ្ញុំមិនមែនមកហូបបាយឯកឧត្តមទេ គឺមកហូបតែយុត្តិធម៌តែប៉ុណ្ណោះ ...ខ្ញុំយល់ភ្លាមថា ប្រជាពលរដ្ឋយើងយល់ភារកិច្ចរបស់ខ្លួន ហើយបើគ្មានយើងក៏បាតុកម្មនៅតែមានដែរ"។

លោក ហូ វ៉ាន ដែលជាអ្នកគ្រប់គ្រងរៀបចំបាតុកម្មក៏បានរៀបរាប់ពីស្ថានភាពផ្លូវចិត្តដ៏ពុះពោរស្រុះគ្នារបស់ប្រជាពលរដ្ឋដែលចេញមកទីទានយ៉ាងចំហរដល់រដ្ឋអំណាចម្តង១រាប់ម៉ឺននាក់ជាមួយថ្នាក់ដឹកនាំគណបក្សសង្គ្រោះជាតិ បើយើងគិតថា ម្នាក់ហូបអស់១ដុល្លាក្នុង១ថ្ងៃក៏មួយថ្ងៃ១ចំណាយអស់រាប់ម៉ឺនដែរ... លោក ហ៊ុន សែន ថា "យើងជិតខ្ស័យទុនហើយ" តែបងប្អូនយើងទាំងក្នុងទាំងក្រៅរឹតតែមានសទ្ធាថែមទៀត លុយរឹតតែស្រួលរកម្លោះ ហើយយើងចង់ធ្វើបាតុកម្មពេលណាក៏បាន...តែយើងចូលចិត្តធ្វើពេលរសៀលជាង ពីព្រោះពេលព្រឹកគណបក្សប្រជាជនគេធ្វើបាតុកម្មគេកៀងគរយុវជនយើងទៅធ្វើឱ្យគេ ហើយឱ្យលុយម្នាក់២ម៉ឺនរៀលដល់ល្ងាចឡើងពួកយុវជនទាំងនោះមកចូលរួមបាតុកម្មជាមួយយើងពេលនោះ គ្នាក៏មានសោហ៊ុយគ្រប់គ្រាន់សម្រាប់ចាក់សាំងនឹងហូបចុកដោយសារមានប្រាក់ពីគណបក្សប្រជាជនឱ្យមក។

ឆ្លើយនឹងសំនួរថា "ហេតុអ្វីក៏លោក សម រង្ស៊ី ជាប្រធានថា លោកចងសម្ព័ន្ធភាពជាមួយនឹងចិន រីឯលោក សុខា ជាអនុប្រធានថា ចងសម្ព័ន្ធភាពជាមួយនឹងអាមេរិក?" លោក សុខា ឆ្លើយថា "យើងដឹងថា ចិនជាមហាអំណាចមួយនៅក្នុងតំបន់ដែលយើងមាននយោបាយមួយមិនយកជាសត្រូវទេ តែចង់ឃើញចិនចេញពីការគាំទ្រដល់ ហ៊ុន សែន តែយើងក៏ដឹងដែរថា ចិនធ្លាប់គាំទ្រខ្មែរក្រហមរហូតដល់ខ្ទេចខ្ទាំកម្ពុជាយ៉ាងដំណំ ឥឡូវនៅតែមានឈ្មួនចិនមករកស៊ីជាមួយលោក ហ៊ុន សែន បំផ្លាញព្រៃឈើបរិដ្ឋានខ្មែរដដែលបន្តទៅទៀត... ខ្ញុំ និង សម រង្ស៊ី បានសន្យានឹងគ្នាថា ធ្វើនយោបាយប្រជាធិបតេយ្យផ្តល់សុខសន្តិភាពរីកចំរើនជូនប្រជាពលរដ្ឋមិនឱ្យប្រទេសណាមកធ្វើបាបជាតិយើងបានទៀតទេ"។

សំនួរមួយចំនួនទៀតបានត្រូវឆ្លើយហើយទទួលនូវការទះដៃនឹងស្រែកបន្ទពេញចិត្តនឹងដឹងគុណដែលបានធ្វើសកម្មភាពនយោបាយជូនរាស្ត្របានប្រសើររហូតដល់ម៉ោងជិត១០យប់ ភ្លេចបាយភ្លេចទឹក ពីព្រោះមិនមានទទួលភោជនាហារនារាត្រីនោះទេ ។ ប្រាក់រៃអង្គាសប្រមាណ៨ពាន់ដុល្លារ នារាត្រីនោះបានត្រូវបញ្ជូនទៅកម្ពុជាទាំងអស់ជាជំនួយដល់ការតស៊ូបន្តទៅទៀតពីពលរដ្ឋខ្មែរនៅឆ្នេរខាងកើតនៃសហរដ្ឋអាមេរិក ៕

## Continued from page 13
## MERRIMACK REPERTORY THEATRE SEEKS...

learn how to survive on his own.

GLENN – mid 20s – Chinese-American male; A smart, educated, good-looking, clean -cut preppie. Conservative and focused, but not without emotional strength when necessary.

To submit, interested actors may send a headshot and resume to auditions@mrt.org. Headshots can be professionally taken or a simple photo taken with a camera or phone. Hard copies can be sent to:

Year Zero Casting
Merrimack Repertory Theatre
132 Warren Street
Lowell, MA 01852

For further information, actors may email questions to auditions@mrt.org or call 978-654-7953.

MRT (Merrimack Repertory Theatre) is one of Massachusetts' most highly-regarded theatre companies and one of only three theatres in the state to be a member of LORT (the League of Resident Theatres) which represents the 74 leading non-profit theatres in America. Under the artistic direction of Charles Towers since 2001, it has become known for producing an eclectic mix of new plays and regional premieres, with an emphasis on writers giving voice to the American experience. Since its founding in 1979, MRT has served as a vital cultural, educational and economic resource for Greater Lowell and its surrounding region.

Merrimack Repertory TheatrePerformance Space: The Nancy L. Donahue Theatre (In Liberty Hall, adjacent to Lowell Memorial Auditorium)50 E. Merrimack StreetLowell, MA 01852Box Office: 978-654-4678

## តមកពីទំព័រទី ១៣ អាជ្ញាធរនាំខ្លួនអ្នកតវ៉ាឡើងតុលាការ...

តាមទូរស័ព្ទនៅព្រឹកនោះថា កុំឱ្យខ្វល់។

អ្នកស្រីបានមានប្រសាសន៍ថា "គាត់បានប្រាប់ខ្ញុំថា គាត់នៅជាមួយអ្នកតវ៉ាផ្សេងទៀត។ បន្ទាប់មកទូរស័ព្ទរបស់គាត់ស្ងាត់ឈឹង ហើយនៅម៉ោង២រសៀលមានគេទូរស័ព្ទប្រាប់យើងឱ្យទៅយកសាកសពគាត់"។

សម រ៉ាវី គឺជាអ្នកតវ៉ាម្នាក់ក្នុងចំណោមអ្នកតវ៉ាយ៉ាងហោចណាស់ប្រាំនាក់ដែលកងរាជអាវុធហត្ថបានបាញ់សម្លាប់នឹងកាំភ្លើង អាកា-៤៧ អំឡុងពេលបង្ក្រាបបានជោគជ័យលើការធ្វើកូដកម្មទូទាំងប្រទេសនេះដែលបានកើតឡើងស្របពេលជាមួយនឹងមហាបាតុកម្មរបស់គណបក្សប្រឆាំង។

នៅថ្ងៃសុក្រ កូដករ១៣នាក់ដែលត្រូវបានវាយដំ និងចាប់ខ្លួនអំឡុងពេលតវ៉ានៅតាមផ្លូវវេងស្រេងនឹងត្រូវបញ្ជូនទៅសាលាដំបូងរាជធានីភ្នំពេញជាមួយមនុស្ស១២នាក់ទៀតតាមការចោទប្រកាន់ពីបទបំផ្លិចបំផ្លាញទ្រព្យសម្បត្តិដោយចេតនា។

ការបើកសវនាការជំនុំជម្រះពួកគេពីបទបំផ្លិចបំផ្លាញទ្រព្យសម្បត្តិដែលធ្វើឡើងបន្ទាប់ពីបានជាប់ឃុំអស់រយៈពេលជិតបួនខែនៅក្នុងពន្ធនាគារដែលមានសន្តិសុខតឹងរ៉ឹងនៅជិតព្រំដែនវៀតណាមក្នុងខេត្តកំពង់ចាមនេះ គឺជាការប្រឹងប្រែងលើកដំបូងរបស់រដ្ឋាភិបាលដើម្បីចាត់វិធានការលើការតវ៉ាកាលពីថ្ងៃទី៣ ខែមករា។

ឈីវ ផានិត ជាភរិយាមេម៉ាយរបស់ សម រ៉ាវី បាននិយាយនៅឯផ្ទះម្តាយគាត់កាលពីម្សិលមិញថា "យើងកំពុងរង់ចាំក្រសួងមហាផ្ទៃទាក់ទងមកយើង ដើម្បីផ្តល់ចម្លើយអំពីការសម្លាប់នេះ"។

ផានិត បានជួប សម រ៉ាវី ពេលធ្វើការនៅក្រោមការគ្រប់គ្រងរបស់គាត់កាលពីឆ្នាំ២០០៨ ហើយបានរៀបការជាមួយគាត់រយៈពេលពីរឆ្នាំក្រោយមក។ បន្ទាប់ពីគាត់ស្លាប់ទៅ ផានិត បានត្រឡប់មកផ្ទះនៅកំពង់ស្ពឺវិញ ដើម្បីឱ្យម្តាយគាត់ជួយចិញ្ចឹមកូនប្រុសអាយុ៣ឆ្នាំ និងកូនស្រីដែលមានអាយុជិត១ឆ្នាំរបស់គាត់។

ផានិត បាននិយាយថា ការស្ទាក់ស្ទើររបស់អាជ្ញាធរក្នុងការបង្ហាញចំណាប់អារម្មណ៍ចំពោះការបាញ់សម្លាប់ សម រ៉ាវី បានបង្ហាញឱ្យឃើញយ៉ាងច្បាស់ចាប់តាំងពីថ្ងៃដែលគាត់ត្រូវបានបាញ់សម្លាប់មកម្ល៉េះ។ ផានិត បាននិយាយថា "ពួកគេបានទុកសាកសពប្តីខ្ញុំចោល និងចោទថា គេបាញ់សម្លាប់គាត់ដោយសារគាត់លួចម៉ូតូគេ"។

នៅល្ងាចថ្ងៃទី៣ ខែមករា ផានិត បានទៅដល់វត្តមួយ ហើយត្រូវបានគេបង្ហាញសាកសពប្តីរបស់គាត់ដែលនៅពាក់បូក្បាលសរសេរពាក្យទាមទារប្រាក់ខែ១៦០ដុល្លារដដែល ។ ផានិត បាននិយាយថា "ពួកគេនិយាយថា វាជាខ្មោចឆ្កែ ហើយខ្ញុំមានការរន្ធត់ណាស់"។ គាត់បាននិយាយថា ក្រោយមកអាជ្ញាធរមូលដ្ឋានមិនព្រមចេញលិខិតបញ្ជាក់ពីការស្លាប់ប្តីគាត់អស់រយៈពេលជាច្រើនខែដោយចោទគាត់ជាចំហថា ជាអ្នកគាំទ្រគណបក្សប្រឆាំង។

ការស្នើសុំជាច្រើនលើកឱ្យមានការស៊ើបអង្កេតលើការស្លាប់ប្តីគាត់មិនបានទទួលអ្វីក្រៅពីទឹកប្រាក់ចំនួន២.៥០០ដុល្លារពីអាជ្ញាធរខណ្ឌនៅក្នុងទីក្រុងភ្នំពេញឡើយ។ ផានិត បាននិយាយថា "យើងមិនជឿថា អាជ្ញាធរ ឬតុលាការកម្ពុជានឹងរកយុត្តិធម៌ឱ្យអ្នកស្លាប់អ្នករងរបួស ឬអ្នកជាប់ពន្ធនាគារឡើយ និងបានច្រានចោលស្ថាប័នរបស់រដ្ឋាភិបាលដែលត្រូវបានបង្កើតឡើងឱ្យស៊ើបអង្កេតអ្វីដែលបានកើតឡើងនៅតាមផ្លូវវេងស្រេងកាលពីថ្ងៃទី៣ ខែមករា។ គាត់បាននិយាយថា "ប៉ុន្តែពួកគេត្រូវតែទទួលខុសត្រូវចំពោះរឿងនេះ"។

នៅឯសួនឧស្សាហកម្មវិឌ្ឍនៈក្នុងទីក្រុងភ្នំពេញ ឈីវ សារុន អាយុ២៥ឆ្នាំជាភរិយាមេម៉ាយរបស់ យាន រិទ្ធី អាយុ២៥ឆ្នាំដែលបានស្លាប់ពេលវះកាត់យកគ្រាប់កាំភ្លើងដែលត្រូវចំពោះនោះបាននិយាយថា ការព្យាយាមរបស់គាត់ដើម្បីចង់បានចម្លើយពីរដ្ឋាភិបាលអំពីការស្លាប់ប្តីគាត់ក៏មិនទទួលបានលទ្ធផលដែរ។

អ្នកស្រី សារុន បាននិយាយថា អាជ្ញាធរមិនខ្វល់អំពីការស្លាប់ប្តីគាត់ទេ ហើយបានបញ្ជាក់ប្រាប់ថា អ្នកស្រីត្រូវបានរារាំងមិនឱ្យទៅមើលប្តីគាត់ដែលកំពុងជិតស្លាប់នៅក្នុងមន្ទីរពេទ្យនោះទេ ហើយរដ្ឋាភិបាលបានបដិសេធយ៉ាងដាច់អហង្ការថា កងរាជអាវុធហត្ថមិនបានសម្លាប់នរណាម្នាក់ឡើយ។

អ្នកស្រី សារុន បាននិយាយរៀបរាប់ពីការព្យាយាមមិនបានសម្រេចជាមួយអង្គការសិទ្ធិមនុស្សដើម្បីឱ្យមានការស៊ើបអង្កេតថា "យើងមិនបានទទួលព័ត៌មានអ្វីមួយពីអាជ្ញាធរឡើយចាប់តាំងពីការស្លាប់នេះមក។

អ្នកស្រី សារុន បានប្រៀបធៀបសមត្ថភាពរបស់រដ្ឋាភិបាលនៅក្នុងការចាប់ខ្លួន ការដាក់ពន្ធនាគារ?និងការកាត់ទោសអ្នកតវ៉ាទាំង១៣នាក់ដែលត្រូវបានចាប់ខ្លួនកាលពីថ្ងៃទី៣ ខែមករាទៅនឹងការស៊ើបអង្កេតមិនជោគជ័យរបស់រដ្ឋាភិបាលលើការបាញ់សម្លាប់មនុស្សទាំងនេះ។ អ្នកស្រី សារុន បាននិយាយពីកងរាជអាវុធហត្ថដែលបានបាញ់សម្លាប់ប្តីគាត់ថា "គេមិនសង្ស័យថាមានការផ្តន្ទាទោសជនល្មើសនោះឡើយ"។

នៅក្នុងខេត្តកំពង់ស្ពឺ ផានិត បានសួរអំពីអាទិភាពរបស់រដ្ឋាភិបាល។ គាត់បាននិយាយថា "រដ្ឋាភិបាលត្រូវស៊ើបអង្កេតលើការបាញ់សម្លាប់មនុស្សផង មិនមែនស៊ើបអង្កេតតែលើការបំផ្លាញទ្រព្យសម្បត្តិនោះទេ។ អ្នកស្លាប់ទាំងនោះមានប្រពន្ធ និងកូនដែលកំពុងរង់ចាំពួកគេ។ ការបំផ្លាញទ្រព្យសម្បត្តិអាចជួសជុលបាន ប៉ុន្តែមនុស្សទាំងនោះ មិនអាចរស់ឡើងវិញបានទេ"៕

**គីមហឿន**



# ដំណើរកំសាន្តលើទឹកដី កោះត្រល់

ផែនេសាទនៅកោះត្រល់

ភ្ញៀវទេសចរកំសាន្តនៅកោះត្រល់







បំផ្លាញសារមន្ទីរ



កន្លែងផលិតទឹកត្រីឆ្ងាញ់



ផ្សាររាត្រីកោះត្រល់



ហាងលក់គ្រឿងអលង្ការ





សកម្មភាពធ្វើទារុណកម្ម



**កោះត្រល់កាលពីអតីតកាលជារបស់ខ្មែរ ប៉ុន្តែបានធ្លាក់ទៅក្នុងការគ្រប់គ្រងរបស់ប្រទេសវៀតណាមរាប់សិបឆ្នាំមកហើយ ។ កោះមួយនេះស្ថិតនៅចម្ងាយប្រមាណជា១២គីឡូម៉ែត្រ ពីឆ្នេរសមុទ្រខេត្តកំពត ហើយត្រូវបានអាជ្ញាធរវៀតណាមកសាងជាទីក្រុងទេសចរណ៍ដ៏ស្រស់ស្អាតមួយ និងមានព្រលានយន្តហោះដ៏ធំមួយទាក់ទាញភ្ញៀវទេសចររាប់សែននាក់ក្នុងមួយឆ្នាំៗ ។**

...នៅក្នុងឱកាសនៃពិធីបុណ្យចូលឆ្នាំខ្មែរខ្ញុំពុំបានស្ថិតនៅក្នុងស្រុកខ្មែរទេ គឺខ្ញុំរួមជាមួយបណ្តាមិត្តភ័ក្តិមួយក្រុមបានធ្វើដំណើរកំសាន្តនៅលើទឹកដីកោះត្រល់ (វៀតណាមហៅភូក្វុក) ដែលពីមុនមកខ្ញុំធ្លាប់តែបានឮអ្នកនយោបាយលើកឡើងថា កោះត្រល់បានធ្លាក់នៅក្នុងការគ្រប់គ្រងរបស់ប្រទេសវៀតណាម ប៉ុន្តែពុំបានដឹងថា តើនៅលើកោះត្រល់នោះមានការរៀបចំជាហេដ្ឋារចនាសម្ព័ន្ធបែបណានោះឡើយ ហើយមានប្រជាជនខ្មែររស់នៅដែរ ឬក៏សុទ្ធសឹងជាប្រជាជនវៀតណាមទាំងស្រុង? ។ ចំពោះដំណើរកំសាន្តជាក្រុមនេះបានប្រព្រឹត្តទៅតាមរយៈក្រុមហ៊ុនទេសចរណ៍មួយក្នុងស្រុកខ្មែរជាអ្នករៀបចំដែលក្នុងរយៈពេល ២យប់៣ថ្ងៃភ្ញៀវម្នាក់ៗត្រូវបង់ថ្លៃចំនួន២១៩ ដុល្លារ ។

ពួកយើងបានចេញដំណើរពីភ្នំពេញតាមរថយន្តក្រុងវេលាម៉ោង៦ ព្រឹកថ្ងៃទី១៤ ខែមេសា សំដៅទៅទីក្រុងកំពត ហើយបានទៅដល់កំពតនៅវេលាម៉ោងប្រមាណជា១០ព្រឹក។

ទោះបីជាចម្ងាយផ្លូវពីកំពតទៅកោះត្រល់ ឬភូក្វុកមានចម្ងាយត្រឹមតែ១២គីឡូម៉ែត្រក៏ដោយតែគេមិនអាចឱ្យភ្ញៀវទេសចរចាកចេញកាត់តម្រង់ទៅកាន់តំបន់កោះត្រល់នោះដោយផ្ទាល់នោះឡើយ ។ ហើយប្រសិនបើមានភ្ញៀវណាចង់ទៅកាត់ត្រង់បែបនេះក៏គេពុំអនុញ្ញាតិបានឡើយ ។ ពួកយើងបានផ្ទេរជិះរថយន្តផ្សេងទៀតធ្វើដំណើរអស់រយៈពេលប្រមាណជាកន្លះម៉ោងលើចម្ងាយផ្លូវប្រមាណជា២០គីឡូម៉ែត្រ ទើបទៅដល់ព្រំប្រទល់ខេត្តហាទៀងប្រទេសវៀតណាមជាមុនសិន ។ ទៅដល់ព្រំប្រទល់ភ្ញៀវទេសចរទាំងឡាយអង្គុយរង់ចាំមួយស្របក់ ទើបតំណាងក្រុមហ៊ុនទេសចរណ៍បំពេញលិខិតស្នាមដើម្បីឆ្លងដែន ។ បន្ទាប់មកភ្ញៀវទេសចរធ្វើដំណើរតាមរថយន្តប្រមាណជា១០នាទីបានទៅដល់ផ្សារមួយឈ្មោះថា ហាទៀង ដែលមានសកម្មភាពលក់ដូរយ៉ាងអ៊ូអរ ។ នៅទីនោះ

តទៅទំព័រទី ១៩

## តមកពីទំព័រទី ១៨ ដំណើរកំសាន្តលើទឹកដីកោះត្រល់

ពួកយើងបានចូលបរិភោគអាហារថ្ងៃត្រង់ក្នុងភោជនីយដ្ឋានមួយដែលអ្នកលក់ដូរសុទ្ធតែជាជនជាតិវៀតណាម ប៉ុន្តែក៏មានម្ហូបបែបខ្មែរសំរាប់ឱ្យយើងបរិភោគផងដែរ ។

បន្ទាប់ពីស្រស់ស្រូបអាហារថ្ងៃត្រង់រួចមក ពួកយើងបានបន្តដំណើរតាមរថយន្តដដែលប្រមាណជា១០នាទីទៀតទើបទៅដល់កំពង់ផែសមុទ្រ ដាយហៃ ។ នៅទីនោះមាននាវាទេចរណ៍តូចធំចតត្រៀបត្រា និងមានសកម្មភាពអ៊ូអរទាំងភ្ញៀវទេសចរ និងការប្រកបរបរទទួលទានរបស់ជនជាតិវៀតណាម ។ បន្ទាប់ពីរង់ចាំប្រមាណជា៣០នាទីក៏ដល់ម៉ោងត្រូវចេញដំណើរ ។ ពួកយើងក៏បានឡើងជិះកប៉ាល់ទេសចរណ៍មួយគ្រឿងប្រភេទរ៉ូយ៉ាល់ផ្ទុកអ្នកដំណើរជាង១០០នាក់ ហើយបើកក្នុងរយៈពេលជិតមួយម៉ោងកន្លះលើចម្ងាយផ្លូវប្រមាណ៤៥គីឡូម៉ែត្រ ទើបទៅដល់កោះត្រល់តែបើគេជិះកប៉ាល់ពីកំពតទៅវិញ គេប្រើពេលត្រឹមតែ១៥ទៅ២០នាទីតែប៉ុណ្ណោះ ។ ពេលកំពុងជិះស្ថិតនៅលើផ្ទៃសមុទ្រដ៏ធំល្វឹងល្វើយ យើងក៏បានចោលភ្នែកទៅមើលឃើញកោះត្រល់លាតសន្ធឹងដាច់កន្ទុយភ្នែកដែលអមដោយកូនកោះតូចៗយ៉ាងត្រៀបត្រាផ្សេងទៀត ។ ពេលឡើងទៅដល់កោះត្រល់ភ្លាមអារម្មណ៍របស់យើង

**តទៅទំព័រទី ២៦**



ព្រលានយន្តហោះកោះត្រល់

Grand Opening

សម្ពោធឱសថស្ថាន សិនជ្យួរី

CENTURY PHARMACY & OPTICAL

937 Gorham St All MAJOR INSURANCES ACCEPTED Tel: 978-455-6554

- ទទួល និងផ្ញើវេជ្ជបញ្ជាដោយឥតគិតថ្លៃ
- យកចិត្តទុកដាក់ខ្ពស់ដល់អតិថិជនគ្រប់រូប
- ទទួលគ្រប់ប័ណ្ណធានារ៉ាប់រងទាំង មេឌីឃែរ (Medicare) និងមេឌីឃេដ (Medicaid)
- អាចបង់ប្រាក់ដោយលុយសុទ្ធ,ម៉ាន់នីអ័រដឺ (Money order) ឬដោយចម្លង/ បញ្ជូនតាមទូរសារ
- អាចជួយចំណាយរួមគ្នា បើត្រូវតាមលក្ខណខណ្ឌ
- យើងមានជំនាញខាងជំងឺឆ្លង និងជំងឺរ៉ាំរ៉ៃ
- មានកញ្ចប់ពិសេសជូន




មានបុគ្គលិកខ្មែរ និងនិយាយភាសាខ្មែរ

អាស័យដ្ឋាន : 937 Gorham St Lowell, MA 01852
ទូរស័ព្ទ : 978-455-6554 / ទូរសារ : 978-455-9476

**KhmerPost USA, LLC**

**សារពត៌មានខ្មែរផុសសហរដ្ឋអាមេរិក**

អាស័យដ្ឋាន 45 Merrimack St. Suite 218A. Lowell, MA 01852

លេខទូរស័ព្ទ Phone: 978 677-7163 | Fax: (978) 677-7092

អ៊ីម៉ែល info@khmerpost.us

អានកាសែតនៅគេហទំព័រ www.khmerpost.us

តាមដានយើងនៅទំព័រហ្វេសប៊ុក Like us at: www.facebook.com/KhmerPostUSA

ផ្សាយពាណិជ្ជកម្ម Advertising

អគ្គនាយកទីផ្សារ និងគ្រប់គ្រង សុបិន្ត ពិន Soben Pin, *Managing Partner*

លេខទូរស័ព្ទ 978 - 656 - 8141 (Mobile) 978 677-7163 (Office) |

អ៊ីម៉ែលsobenpin@khmerpost.us

អ្នកនិពន្ធ Editorials

និពន្ធនាយក ពិន សំខុន Roger Samkhon Pin, *Publisher & Editor-in-Chief*

(978) 942 - 1641 | rogerpin@khmerpost.us

អ្នកនិពន្ធកិត្តិយស **Contributed Writers:**

Kim Phien, Kim Sos, Mao Chan Somnom, Mum Yin, Richard Howe Esq. Sengly Kong, Ph.D. James Ostis

រចនាសំណៅកាសែត **Design Artist**

Heng Chhunleng

ជំនួយការរដ្ឋបាល **Administrative Assistant**

Sokha Lim

KhmerPost USA, LLC is an independent newspaper that aims to facilitate mass communication among the Cambodian communities, their neighboring communities, and families. We aim to address local community, and national news; and give an insight into Cambodian & global news. We also strive to bridge the language and cultural gaps and reduce social isolation by publishing in Khmer & English. It published twice a month in Massachusetts serving Greater Lowell, Lynn, Revere, MA, Providence, RI, CT, NY, NJ, and Philadelphia, PA.

Mail subscription is available within the U.S. & Canada at $60.00 or 70 Euros in Europe per year.

The KhmerPost USA has full authorization from Bernard Krisher, the publisher of the Cambodia Daily to reproduce all the articles that are produced by the Cambodia Daily free of charge effective date: 6/19/2009



ហាងខ្មែរជួសជុលរថយន្ត

បើចង់ឱ្យរថយន្តលោកអ្នករត់បានល្អ សូមអញ្ជើញ

**Rathe´s Auto Service**

State and Emission Inspaction General Repairs and Maintenance

MON-SAT, 8:30AM-5:30PM
SUN. EMERGENCY ONLY




- ជាងមានបទពិសោធន៍ជាយូរឆ្នាំ -ជួសជុលរថយន្តគ្រប់ប្រភេទ
- មានដូរប្រេង ដូរហ្វ្រាំង ដូរកង់ និងករណីជាច្រើនទៀត ។
- មានត្រួតពិនិត្យគ្រឿងម៉ាស៊ីន DIAGNOSTICS ដោយឥតគិតថ្លៃ
- មានចុះថ្លៃពិសេស ចាប់ពីខែកុម្ភៈ ២០០៨ ទៅ : - ដូរប្រេងក៏រិត ៥ ក្វាត $22
- INSPECTIONS រថយន្តឆ្នាំ 96 up $49.99+ តាក់ -មានជូនប័ណ្ណពិសេសសំរាប់ដូរប្រេងចុះថ្លៃពាក់កណ្ដាល នៅពេលយកមកជួសជុលអស់តម្លៃ $150.
- តម្លៃជួសជុលទូទៅ សមរម្យ ដោយទាបជាងហាងជួសជុលផ្សេងៗទៀត ។
- ប្ដេជាចិត្តធ្វើជូនដោយហ្មត់ចត់ គុណភាពខ្ពស់ មិនឱ្យខុសបំណងលោកអ្នកឡើយ។ ពិសេស ជួយទៅពិនិត្យដល់កន្លែងនូវរថយន្តណាដែលខូច STARTER ឬ ធុងអាគុយអស់ភ្លើងដោយឥតគិតថ្លៃ ។ *សូមអរគុណ !*

5105 N.2ND ST., PHILADELPHIA, PA 19120. TEL : (215) 329-2418
Fax : (215) 329-2419. Rath CELL : (215) 431-6376

តមកពីទំព័រទី ៩

# វីដេអូសិចនារីម្នាក់ព្រះសង្ឃមួយ

**លទ្ធផលៈ** ខ្សែវីដេអូនេះបានបង្កើតភាពចលាចលដល់សហគមន៍ខ្មែរនៅឡូវែលទាំងមូលភ្លាម ពីព្រោះអំពើដែលនៅក្នុងខ្សែវីដេអូនោះរំលោភយ៉ាងខ្លាំងខ្លាដល់ជំនឿរបស់ក្រុមពុទ្ធបរិស័ទដែលមានទៅលើវត្តអារាមនឹងព្រះសង្ឃរបស់ខ្លួន ហើយបាតុកម្មពលរដ្ឋឡូវែលបានផ្ទុះឡើងភ្លាមនៅមុខ"វត្តខ្មែរឡូវែល"នៅភោជនីយដ្ឋាន "សានីដា"នឹងនៅវត្ត"ត្រៃរតនារាម"ទាមទារឱ្យផ្សឹកលោកសង្ឃ"គឹមតេង"នឹងបណ្តេញទាំង"ម៉ាយ៉ា"ចេញពីវត្តទាំង២នាក់។ ក្នុងរឿងកុនមួយនេះ នាង "ម៉ាយ៉ា" មានទោសធ្ងន់ណាស់សម្រាប់សង្គមខ្មែរ ដោយសារខ្លួនជាស្រីភេទត្រូវមានមាយាទ រំទុំស្គាល់ខុសស្គាល់ត្រូវស្គាល់បុណ្យនឹងបាប ការប៉ះពាល់នឹងរឿងភេទជាមួយប្រុសឈ្មោលនៅក្នុងវត្តគឺជារឿងអាស្រូវអាសោចន៍កេរ្តិ៍ឈ្មោះពេញសហគមន៍ខ្មែរតែនៅសហរដ្ឋអាមេរិកនេះនាង "ម៉ាយ៉ា"មានសិទ្ធជាពលរដ្ឋម្នាក់ដែលរងគ្រោះដោយប្តឹងទៅតុលាការចំពោះជនប្រាំនាក់ ដែលនាងបានប្រាកដក្នុងចិត្តថា "បានចែកផ្សាយកុនដែលមានរូបនាងដោយគ្មានអនុញ្ញាតពីម្ចាស់សាមីខ្លួន" តែមិនបានប្តឹងអ្នកដែលនាងថា "បានធ្វើវីដេអូក្លែងក្លាយកាត់តដាក់រូបនាងកំពុងរួមភេទជាមួយនឹងបុរសជាព្រះសង្ឃ"នោះទេ ។

ធ្ងន់ជាងនាង"ម៉ាយ៉ា"ទៅទៀតនោះ គឺព្រះសង្ឃ"គិមតេង"ដែលបានសច្ចានៅពេញបំពេញព្រះភ្នួសថា ខ្លួននឹងគោរពវិន័យឱ្យបានតឹងរ៉ឹងជាទីគោរពនៃគ្រប់ពុទ្ធសាសនិកបែរជាយករាត្រីកាលយកជញ្ជាំងកុដិជាទីលាក់បាំងអំពើដែលប្រឆាំងនឹងពុទ្ធសាសនាមិនដឹងបោកព្រះបោកពលរដ្ឋតាំងពីពេលណាមកទេ ហើយនៅតែបង្ហាញមុខជាព្រះសង្ឃដដែលយ៉ាងគ្មានខ្មាស់អៀននៅមុខឧបាសកឧបាសិកាជាច្រើនដែលមកប្រគេនចង្ហាន់មកសំពះសុំសីលពីមនុស្សដាច់សីលប្រឆាំងនឹងព្រះនៅមុខកញ្ចក់ទូរទស្សន៍យ៉ាងផ្តើនធ្វើឱ្យអារម្មណ៍អហឹង្សាអ្នកត្រង់ឡូវែលទុបលែងជាប់ក្លាយជាកំហឹងពុះពោរហៅលោកសង្ឃសុទ្ធតែ"អា"ស្ទើរដាច់សាច់លើកគ្នាធ្វើបាតុកម្មស្តីគេះដៀលបន្ទោសឱ្យអ្នកបួសគ្មានឈប់ឈរដែលនេះមិនមែនជាទម្លាប់ខ្មែរនោះទេ ។

ធ្ងន់ជាងអ្នកប្រព្រឹត្តអំពើបំពានវិន័យសង្ឃក្នុងវត្ត គឺអ្នកការពារអំពើអកុសលដែលកើតក្នុងវត្តរបស់ខ្លួន ហើយថា "ករណីក្នុងខ្សែវីដេអូជារឿងប្រឌិត" គឺលោកគ្រូចៅអធិការ "សៅ ឃន" នឹងគណកម្មការវត្តសហគមន៍ព្រះសង្ឃខ្មែរ ។ ថាសាមីខ្លួនចុះមានការខ្មាសអៀនដោយសារូបភាពដ៏អាមាសបានត្រូវចែកផ្សាយពាសពេញចុះអ្នកឯទៀតហេតុអ្វីក៏គាំទ្រឱ្យការឈឺចាប់អូសបន្លាយឆ្ងាយអីម្លេះ? ឥឡូវមានកាសែត"ឡូសាន់" មាន "ម៉ាក្កាស៊ីន"នៅបូស្តុនបញ្ចេញអត្ថបទនឹងរូបភាពយ៉ាងចំហរគ្មានខ្លាច"ម៉ាយ៉ា"ឬ"គិមតេង"ប្តឹងនោះទៀតទេ ពីព្រោះគេដឹងថា រូបភាពក្នុងវីដេអូនោះជារូបពិតឥតក្លែងក្លាយ ហើយមាន "ម៉ាយ៉ា"ក៏បានបញ្ជាក់នៅមុខចៅក្រមថែមទៀត បន្ថែមពីនេះក៏មានសាក្សីច្រើនគ្នាដឹងថា នរណាជាអ្នកដាក់ "កាមេរា"ថតបានអ្វីខ្លះដែរ មានទាំង "អគ្និត ឫទ្ធិពល"



បាតុកម្មប្រឆាំងនឹងទង្វើរបស់"វត្តខ្មែរឡូវែល"កាលពីឱកាសចូលឆ្នាំថ្មី

ដ៏មានប្រជាប្រិយភាពមួយទៀតផងក៏បានដឹងដែរ ហើយបានចេញ "លិខិតណែនាំឱ្យមានឥរិយាបទត្រឹមត្រូវមួយសម្រាប់ជួយការពារព្រះពុទ្ធសានាខ្មែរ"ផង តែគ្មានរណាស្តាប់ឮទេ ។ ព្រឹត្តិការណ៍ដែល"មិនពិត" ឥឡូវក្លាយទៅជា "ពិត" វិញទៅហើយ ធ្វើឱ្យលោកគ្រូចៅអធិការ"សៅ ឃន"នឹងគណកម្មការវត្តបានប្រព្រឹត្តអំពើ "មុសា" ជាសាធារណមួយទៀត នាំទាំងលោកគ្រូចៅអធិការវត្តធំៗនៅសហរដ្ឋអាមេរិកនេះ ចុះហត្ថលេខាភូតភររួមគ្នាប្រមាណ១០អង្គទៀតទៅផង ។ អំពើភូតភរដ៏ធំធេងនេះ បានធ្វើឱ្យអាប់ឱនកិត្តិយសយ៉ាងខ្លាំងដល់ចៅអធិការទាំងអស់នៃសហគមន៍ព្រះសង្ឃខ្មែរ ហើយក៏ធ្វើឱ្យសហគមន៍ខ្មែរទាំងអស់បន្ថែមការបែកបាក់គ្នាយ៉ាងដំណាំផងដែរ រវាងអ្នកដែលមិនអត់ឱនអំពើបាបកម្មរបស់អ្នកបួសនឹងអ្នកដែលមិនចង់ឃើញវត្តខ្មែរថ្មីមួយនេះ ដួលរលំដោយខ្វះអ្នកគាំទ្រក្នុងនោះក៏មានព្រះសង្ឃនឹងគ្រហស្ថគ្មានកំហុសអ្វីសោះដែរ ។

លទ្ធផលនៃការបែកបាក់គ្នាក្នុងសហគមន៍ខ្មែរនេះ គឺជា"ជម្ងឺរ៉ាំរ៉ៃ"ដែលគ្មានការប៉ុនប៉ងព្យាបាលពីចាស់ៗ បណ្តាលឱ្យបន្តភាព "រងគ្រោះ" ដល់សហគមន៍ខ្លួនភាព"រងគ្រោះ"ដល់ជំនាន់ក្រោយរឹតតែខ្លាំងឡើង។ សញ្ញានៃភាពរងគ្រោះនោះមានចាយធនធានច្រើនទៅលើជម្លោះមិនបានជាគំរូឱ្យកូនចៅរៀនបានឆ្ងាយខ្មែរគ្មានតំណាងនយោបាយមកការពារខ្លួនព្រោះគ្មានការចុះសម្រុងវប្បធម៌ខ្មែរទ្រុឌទ្រោមដោយយើងចិញ្ចឹម"វប្បធម៌ជម្លោះ" ចិញ្ចឹមជម្ងឺ ចិញ្ចឹមក្រ ចិញ្ចឹម "ចចេស" ...។ល។ ដោយសារតែលទ្ធផលដូច្នេះហើយបានជារឿងដែលពាក់ព័ន្ធនឹងវិន័យព្រះសង្ឃនឹងកន្លែងដែលសន្មតថា"វត្តអារាមសការៈ" ពុំមែនជារឿងឯកជនទៀតទេ។ រីឯរឿង "ផ្លូវភេទ" របស់ស្ត្រីម្នាក់នឹងបុរសម្នាក់ទៀត ដែលជាមនុស្សជំទង់ដូចគ្នា ពុំមែនជា"កំហុស"អ្វីឡើយ ដោយសារយើងទទួលស្គាល់ទាំងអស់គ្នាថាជា"សិទ្ធ"...ក្នុងរូបភាពនេះ"ម៉ាយ៉ា"កំពុងតែ"រងគ្រោះ" គួរឱ្យអាណិតទៅវិញ ដោយសារសហគមន៍ "បណ្តេញ" នាងចេញយ៉ាងអាម៉ាស់ ដែលគួរណាស់តែ "គឹមតេង" លោកគ្រូ"សៅឃន"នឹងគណកម្មការចេញមុខមកការពារសារភាពប្រឈមមុខនឹងភាពពិត ដោះនាងឱ្យរួចពីច្រវ៉ាក់សហគមន៍ចេញ ។

សាកល្បងដោះស្រាយៈដំណោះស្រាយប្រសើរជាងគេ គឺការទទួលស្គាល់ការពិតធ្វើសេចក្តីសម្រេចចិត្តតាមការពិតនោះ ដោយប្រើព្រះធម៌ជាគោលការណ៍ដែលជាជំនាញរបស់ព្រះអង្គ"សៅ ឃន"ស្រាប់ទៅហើយនោះ។ គួរបញ្ឈប់ចាយលុយទៅលើមេធាវីតទៅទៀត ហើយមកចាយដើម្បីឱ្យមានការចុះសម្រុងគ្នារកអ្នកជំនាញការថា"តើរូបមនុស្សពីរនាក់នោះពិត ឬមិនពិត?"។ ប្រជាពលរដ្ឋខ្មែរនៅឡូវែល ក៏ដូចនៅទីផ្សេងនៅមានចិត្តសណ្តោសប្រណីច្រើននៅឡើយដែលជាវប្បធម៌កេរ្តិ៍ដំណែលតច្រើនសតវត្សមក ហើយគេអាចនឹងសណ្តោសការ "ចចេសភូតភរ" របស់ព្រះអង្គជាថ្មីម្តងទៀតបាននៅពេលគេបានឃើញលោក"គឹមតេង ចាកសិក្ខាបទដោយគ្មានការបង្ខិតបង្ខំ" ហើយក៏អាចក្លាយជាប្តីពេញច្បាប់របស់ "ម៉ាយ៉ា" ផងដែរនោះ វាជាដំណើររឹតតែប្រសើរជាងការនៅលួចលាក់ថែមទៀត ។

"បណ្ឌិត ឫទ្ធិពល" បានបញ្ចេញអនុសារណៈនៅឆ្នាំមុនក្នុងនាមជាអ្នកដឹងរឿងផងនឹងជាអតីតព្រះសង្ឃជាមិត្រដ៏ប្រសើររបស់សហគមន៍ព្រះសង្ឃខ្មែរផង កាលពីពេលផ្ទុះរឿងអាស្រូវភ្លាមបានលើកថា ឱ្យ"គិម តេង សឹកទៅ"កុំឱ្យខូចសាសនាព្រះពុទ្ធ... ថ្វីត្បិតតែគ្មាននរណាបានចាប់អារម្មណ៍តែមួយឆ្នាំកន្លងទៅ ហើយនៅតែ"ត្រូវ"នៅឡើយ ៕

ភោជនីយដ្ឋានស៊ីម ភ្លីខ្មែរ
Simply Khmer Restaurant
Open 7 days a week from 8AM-9PM
បើករៀងរាល់ថ្ងៃ ចាប់ពីម៉ោង៨ព្រឹក ដល់ម៉ោង ៩យប់
26 Lincoln #4, Lowell, MA 01851 • (978) 454-6700
គេហទំព័រ: www.simplykhmerrestaurant.com

តមកពីទំព័រទី ១

## សញ្ញានៃថ្ងៃអន្សាររបស់ ហ៊ុន សែន

រង់ចាំយ៉ាងទន្ទឹងពីក្រុមអ្នកគាំទ្រគណបក្សសង្គ្រោះជាតិអ្នកទាំងនោះ មិនបានឃើញដង្ហាបដ៏អស្ចារ្យរបស់ប្រជារាស្ត្រដែលចង្អុលថា "ថ្ងៃអន្សា ហ៊ុន សែន" ជិតមកដល់ ហើយនោះទេ។

ស្ថានភាពនយោបាយមិនដូចពេលមុនទេ កាលពីឆ្នាំ១៩៧៨-៩០ហ៊ុន សែនមានកម្លាំងចិន-យួនកុម្មុយនីស្ត មានជោគជ័យលើក្រុមប៉ុលពត នឹងគ្រប់គ្រងលើរាស្ត្រក្រីក្រទើបចេញពីសេចក្តីស្លាប់មកប្រើដើម្បីពង្រឹងអំណាចផ្តាច់ការរបស់ខ្លួនរួមគ្នានឹងកម្លាំងអាវុធនយោបាយនោះបង្ខំអ្នកស្រែកឃ្លានឱ្យនៅខាងខ្លួនបានមួយរយៈ ។ ឥឡូវអំណាចនោះនៅតែប្រើសម្រាប់គាបសង្កត់រាស្ត្រក្រីក្រ នឹងអ្នកហ៊ានប្រឆាំង ដើម្បីពង្រីកសម្បត្តិឱ្យទៅជាអំណាចនៃមហាសេដ្ឋីនឹងក្រុមបរិវារតែអំពើដ៏ស្មោកគ្រោតស្អុយគ្រុតនេះ រីកធំរហូតដល់គ្របលែងជិតរាស្ត្រលែងជឿលែងខ្លាច។ រាស្ត្រខ្មែរពេលនេះមានបទពិសោធន៍មានសេចក្តីក្លាហានមានជំនឿលើខ្លួនឯងច្បាស់លាស់។ ដូច្នេះមិនដូចឆ្នាំ១៩៩៣ទេ ដែលងើបពីសង្គ្រាមភ្លាមខ្វះមុខខ្វះក្រោយសង្ឃឹមព្រះករុណាមកជួយស្រោចស្រង់កម្ពុជាតែព្រះរាជបុត្រដែលព្រះអង្គនាំទៅកាន់អំណាចជានាយករដ្ឋមន្ត្រីទី១ ឈ្វេងយល់ថា "ប្រទេសកម្ពុជាពុំទាន់អាចទទួលយកលទ្ធិប្រជាធិបតេយ្យបាននៅឡើយទេ"គួរឱ្យស្តាយ! ពេលមុនបោះឆ្នោត១៩៩៣ សម្តេច សីហនុ ប្រកាសសន្យាជាសាធារណថា "ប្រទេសកម្ពុជានឹងក្លាយជាប្រទេសសេរីប្រជាធិបតេយ្យពហុបក្ស" តែដល់បោះឆ្នោតឈ្នះប្រកាស "លទ្ធផលបោះឆ្នោតអ.ស.ប.ជាមោឃៈឱ្យកូនប្រុសរ៉ាណា ឫទ្ធិ៍នឹង ហ៊ុន សែន ក្លាយជានាយករដ្ឋមន្ត្រីទាំងពីរនាក់ ហើយនាំសភាធម្មនុញ្ញទៅធ្វើច្បាប់បង្កើតព្រះមហាក្សត្រនាទីក្រុងប៉េកាំងដែលមាន



ព្រះអង្គខ្លួនឯងជាអ្នកឡើងគ្រងរាជ្យ នាឆ្នាំ១៩៩៣ ហើយ ហ៊ុន សែន នៅដង្ហែរព្រះអង្គពីក្រោយរហូតដល់ចូលទីវង្គត់ ហើយក៏យកអំណាចទាំងអស់មកវិញ។ តែ២០ឆ្នាំក្រោយមក ទើបមានគណបក្សនយោបាយខ្មែរ"បរិសុទ្ធ"២ផ្តុំបចូលគ្នាបាន គឺគណបក្ស "សិទ្ធមនុស្ស" នឹងគណបក្ស "សម រង្ស៊ី" រួមគ្នាជាគណបក្ស "សង្គ្រោះជាតិ" ដែលប្រជាជាតិគេគាំទ្រច្រើន ដោយសារប្រវត្តិច្រើនឆ្នាំតស៊ូយ៉ាងក្លាហានឥតងាករេ ដើម្បីប្រទេស "ប្រជាធិបតេយ្យសេរីពហុបក្ស"នោះ បានបង្ហាត់បង្ហាញគំរូឱ្យរាស្ត្រចេះទាមទារសិទ្ធរបស់ខ្លួន ដោយខ្លួនឯង ការតស៊ូពិតប្រាកដដើម្បីអំណាច "ដោយប្រជារាស្ត្រ" ប្រឆាំងនឹងជនផ្តាច់ការបានចាប់កំណើតឡើងហើយ ។ ការចចាជាមួយគណបក្សប្រជាជន បើទោះជាគណបក្សសង្គ្រោះជាតិចាញ់កល្បគេក៏ដោយក្តីក៏ពេលនេះមិនអាចទុកប្រជាពលរដ្ឋដែលបះបោរនៅ"ក្រៅឆាក"បានទៀតឡើយ ។ ពលរដ្ឋសព្វថ្ងៃនេះ ជាកំឡាំងជាតិកំឡាំងនយោបាយ-សេដ្ឋកិច្ចនឹងកំឡាំងអន្តរជាតិតែទ្រេតទៅខាងណាហើយជ័យជំនះនឹងនៅខាងនោះ សម រង្ស៊ី នឹង កឹម សុខា ក្នុងនាមជាថ្នាក់ដឹកនាំគណបក្សសង្គ្រោះជាតិ "មានកិត្តិយសខ្ពស់" ណាស់ដែលរាស្ត្រភាគច្រើននៅជាមួយ។ រីឯ ហ៊ុន សែន នឹងបរិវា"បានបាត់បង់តិត្តិយស" របេះអំណាចពីដៃម្តងបន្តិច "ដង្ហាបពលរដ្ឋកំពុងច្របាច់គណបក្សប្រជាជន" ឱ្យចេញពីអំណាចហើយ។

គ្មានគំនិតក្បត់ផ្ទៃក្នុងយើងបានប្រើពាក្យថា "បរិសុទ្ធ"ដោយចង់សំដៅទៅរកអំពើ"សុច្ចរិតយុត្តិធម៌ សច្ចធម៌"របស់គណបក្សខ្មែរនិមួយៗ ។ គណបក្សប្រជាជន គណបក្សរាជានិយម បានបាត់បង់គុណសម្បត្តិទាំងនោះអស់ហើយ នៅសល់តែគណបក្សសង្គ្រោះជាតិតែមួយប៉ុណ្ណោះ ដែលជាឈ្មោះថ្មីមែនតែ"ចាស់"ដោយការបង្ហាញគំរូនាំមុខដឹកនាំតស៊ូដ៏ស្វិតស្វាញ...ការចូលរួមក្នុងចលនាបាតុកម្មអហិង្សាយ៉ាងច្រើនសន្ធឹកសន្ធាប់នឹងគ្មានបង្ខិតបង្ខំពីប្រជាពលរដ្ឋ គឺជាការទទួលស្គាល់នូវគុណសម្បត្តិដ៏ថ្លៃថ្លាខាងលើនោះហើយ។ បើហ៊ានសន្យាថា "រំលំរបប ហ៊ុន សែន ឱ្យបាន" ហើយបែរជាទៅពង្រឹងរបបហ្នឹងទៅវិញនោះ គេនឹងកត់សំគាល់ថា ជា"អំពើក្បត់សំដីខ្លួនឯង" ធ្វើសម្រាប់ឱ្យគេជឿតែមួយភ្លែតបាន ។ អំពើដែលសម្មត់ថា"ក្បត់"បានមួយទៀតនោះ គឺ"អាច"ដោយសារមានគណបក្ស២ចូលរួមធ្វើការជាមួយគ្នា បើមានការធ្វើការចង់បានជោគជ័យតែម្នាក់ឯង ហើយរំខានដោយចំហរ ឬសំងាត់ដល់សមាជិកដទៃទៀតមិនឱ្យធ្វើការបានលទ្ធផលល្អប្រសើរ...នៅមានការវាយតម្លៃលើកាងាររបស់សមាជិក ទៅតាមរូបមន្ត"នេះជាក្រុមរង្ស៊ី" ឬក៏"នោះជាក្រុមសុខា"គឺជាការបំបាក់ស្មារតីមិនបានលើកទឹកចិត្តក្រុមកាងារអាចបណ្តាលឱ្យខូចការច្រើនបាន ។ ឥឡូវនេះគេអាចវាស់សញ្ញានៃបាន "អំពើក្បត់ផ្ទៃក្នុង"បាន ដោយសារប្រជាពលរដ្ឋកាន់តែមានការឈ្លាសវៃ ចំពោះវាសនារបស់ខ្លួនមិនចូលរួមឬក៏បន្ទោសយ៉ាងចំហរដល់គណបក្សនយោបាយណាដែលពួកគេមិនពេញចិត្ត។ ដង្ហាប "បណ្តេញហ៊ុន សែន ចុះចេញទៅ"នឹងរឹតតឹងឡើងៗ គ្មានពេលឈប់ឈរស្របគ្នានឹងការគាំទ្រដោយសារភាពរាស្ត្រអាចទុកចិត្តបានកាន់តែខ្ពស់ លើការ "គ្មានគំនិតក្បត់ផ្ទៃក្នុង"របស់គណបក្សសង្គ្រោះជាតិ ។

គណបក្សប្រជាជនរង្គោះរង្គើពុំអាចផ្តិវិញបាន ក្រៅពីកម្លាំងបាយលើជនគ្មានអាវុធគណបក្សប្រជាជនកំពុងលង់ទៅក្នុងអបាយមុខកាន់តែជ្រៅ "គ្មានអ្វីអាចធ្វើជាអំណោយ"ដល់ពលរដ្ឋទៀតបានទេ ។ពលរដ្ឋនៅចងចាំមិនភ្លេចទេ កាលពីនៅ "របបរដ្ឋកម្ពុជា"ដ៏តឹងតែងនឹងក្រខ្សត់ល្វេមល្វាមមកដល់១៥ឆ្នាំក្រោយនៃរបប"អ៊ុនតាក់"ដែលសហគមន៍អន្តរជាតិជ្រោមជ្រែងហើយប្លន់ដណ្តើម "មានបាន" តែម្នាកឯង ជាមួយតែបក្សពួកជាបរិវាភ្លេចរាស្ត្រដែលចេញពីភក់ជ្រាំដូចគ្នាគឺជាចរិកដែលនរណាក៏ខ្ពើមឆ្អើមជាទីបំផុតដែរ ។ គណបក្សប្រជាជននៅ២០ឆ្នាំបន្តរមកទៀតរបស់ ហ៊ុន សែន បាន "ចែកផ្លូវពីរាស្ត្រ"របស់ខ្លួនយ៉ាងច្បាស់ក្រឡែត នៅក្នុងគណបក្សនោះទៀតសោទចែកលុយនឹងអំណាចមិនស្មើរគ្នា ក៏បែកជាក្រុមតូចៗ ដូចជាក្រុមជា ស៊ីម-ស ខេង ក្រុម ហ៊ុន សែន - សុខ អាន ក្រុមជាសុភារា ក្រុមមេទ័ពទាហ៊ានមេប៉ូលីសដែលគ្មានលាភសក្ការៈឡើងឋានៈមិនរួចមិនមែនចងសម្ព័ន្ធដោយក្តីស្រឡាញ់ឧត្តមគតិដូចគ្នាអ្វីទេ ក៏ដោយសារតែមានប្រយោជន៍ផ្ទាល់ខ្លួន ឬដោយមានការគម្រាមតែប៉ុណ្ណោះ ដូច្នេះប្រាកដជាមិនអាចផ្តុំគ្នាជា "កម្លាំងជាតិ"សម្រាប់ទប់ទល់កម្លាំងប្រជាពលរដ្ឋបានទេ...ដូច្នេះកម្លាំងដែលនៅសល់របស់ ហ៊ុន សែន គឺដូចសត្វហ៊ីងមានតែខ្យល់ធ្វើឱ្យគេ "ច្រឡំថាធំមានកម្លាំង"បានខ្លះ។ នេះគឺជាភាពល្ងង់ខ្លៅរបស់ ហ៊ុន សែន ថ្មីមួយទៀត ដែលមិនបានប្រើប្រាជ្ញាសម្រាប់ស្រោចស្រង់ "ឱកាសកាន់តែខ្លី" សម្រាប់ឱ្យរួចទុក្ខទោសនាដែលនឹងត្រូវទទួលខាងមុខនេះទេបែរជាបន្ថែមល្បឿនខាងសម្លាប់មនុស្សស្លូតត្រង់ទៅវិញ តែគណបក្សប្រជាជននៅតែជឿលើ"ហ៊ីង"នេះនៅឡើយ។

អតីតប្រធានាធិបតីមូស្តាភាហ្វ នៃប្រទេសអាហ្វគ្គានីស្ថានបានដើរមួយជំហ៊ានមុន ហ៊ុន សែន បង្ហាញគំនូសជោគវាសនាអនាគតរបស់គាត់ថា "បានឡើងជាប្រធានាធិបតីច្រើនអាណត្តដោយលួចសន្លឹកឆ្នោត"ថាខ្លួន "បានជួយអាមេរិកាំងច្រើនណាស់សម្រាប់កំចាត់ភេរវកម្មអាល់ខៃដា" តែថ្ងៃអន្សានៅតែមកដល់ទាល់តែបាន... ឥឡូវគាត់ជាប់គុកប្រជារាស្ត្ររង់ចាំការកាត់ទោសអស់ជីវិតដែលបាន"កសាងអំពើបាបលើប្រជារាស្ត្រនឹងប្រទេស"របស់ខ្លួនឯង។

រីឯគណបក្សប្រជាជនខ្លួនឯងកំពុងបន្តការរង់ចាំ"ហ៊ីង"នោះ មកដោះស្រាយវាសនាអនាគតឱ្យខ្លួននឹងក្រុមគ្រួសារនោះទាំងភ័យព្រួយបារម្ភផង នឹងសង្ឃឹមខ្លះៗផង...បើពេលវេលាមកដល់អ្នកនៅតែមិនបានកសាងគុណសម្បត្តិខ្លះទេនោះ ដូចជាឱ្យមានការដោះដូរ"ហ៊ីង"ដែលនៅរឹងរូសបញ្ចេញសម្លេងនោះចេញភ្លាមសម្រួលដល់ការចរចាដ៏ត្រឹមត្រូវមួយដំណោះស្រាយដ៏មានប្រយោជន៍សម្រាប់ខ្លួនឯងក៏នឹងកើតឡើងភ្លាមដែរ ប្រជារាស្ត្រនឹងចងចាំហើយសណ្តោសអ្នករង់ចាំ"ស៊ីឡាក"បានខ្លះ ៕






**កម្មវិធីថែសុខភាពតាមគេហដ្ឋាន សម្រាប់ចាស់ខ្ញុំៗ និងជនពិការភាព**

-នាងថែខ្ញុំដូចជាម្តាយបង្កើត ខ្ញុំសប្បាយចិត្តណាស់
-នាងស្រលាញ់ និងថែខ្ញុំដូចជីដូនបង្កើត

- នាងចំអិនម្ហូប បោសសំអាតផ្ទះ បោកខោអាវ ហើយស្តាប់រឿងពេលខ្ញុំកើតទុក្ខ
- ខ្ញុំមានពេទ្យមកពិនិត្យសុខភាពជាប្រចាំ
- នាងរំលឹកពេលដែលខ្ញុំត្រូវញ៉ាំថ្នាំ គ្រប់ពេលវេលា
- នាងជូនខ្ញុំដើរលេងលំហែកាយ
- នាងជួយខ្ញុំទិញម្ហូប និងសំភារៈប្រើប្រាស់
- កូនខ្ញុំមិនព្រួយអំពីភាពអត់ការងារធ្វើ ហើយបាននៅក្បែរខ្ញុំ គ្រប់ពេលវេលា
- ព្រឹទ្ធាចារ្យជាដុំពេជ្រក្នុងសង្គមយើង ចូរអ្នកទាំងអស់ខំថែទាំគាត់មានអាយុវែល និងសុខភាពល្អ ។

ក្រុមហ៊ុនយើងខ្ញុំកំពុងជ្រើសរើសបុគ្គលិកធ្វើការ
សម្រាប់ព័ត៌មានបន្ថែមអំពីកម្មវិធីនេះ សូមទាក់ទង
ម៉ូនីដា (២៦២) ២៦២-៣៩២៩ ដេវីស (២៦៧) ៩១៨-៨៤៩៣

